សារព័ត៌មាន ខ្មែរផុស ស.រ.អា.

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 978-942-1641

មាតិការរឿង Issue 171 Feb.21th.-March.06th. 2015

Free



Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## វិចារណកថា

## បទសម្ភាសន៍ជាមួយព្រះអង្គម្ចាស់ ស៊ីសុវត្ថិ ធម្មិកោ (ភាគបន្ត)

**ដោយៈ ពិន សំខុន**

ព្រះអង្គម្ចាស់ស៊ីសុវត្ថិ ធម្មិកោ គណកម្មការនាយកនៃគណបក្សសង្គ្រោះជាតិបានយាងមកធ្វើទស្សនកិច្ចនៅសហរដ្ឋអាមេរិកចំនួន២ខែ ដោយផ្ដើមនៅឡូវែលកាលពីដើមខែមករា២០១៥នេះ **តទៅទំព័រទី ០៣**


ទ្រង់ស៊ីសុវត្ថិ ធម្មិកោនៅឡូវែល

# ខ្មែរ_អាមេរិកាំង បានឡើងជាចៅក្រមនៃសាលាក្ដីជាន់ខ្ពស់នៅ"ជ៉ចចា"

## A Cambodian-American became a rural Georgia judge

**ខ្មែរផុស ស.រ.អា.**

ចៅក្រមនៃសាលាក្ដីជាន់ខ្ពស់ម្នាក់ឈ្មោះ ម៉េង លីម អាយុ៤២ឆ្នាំ ដើមកំណើតខ្មែរ ទើបនឹងធ្វើសច្ចាប្រណិធានចូលកាន់ដំណែងនៅ "ថាលាភូសា"រដ្ឋ "ជចចា"ខាងលិច កាលពីខែធ្នូមុននេះ ។ នេះជាលើកដំបូងបង្អស់ដែលមានខ្មែរម្នាក់ចូលទៅកាន់ដំណែងជាចៅក្រមអាមេរិកាំង ។

លោក ម៉េង លីម កើតនៅមុនឆ្នាំ១៩៧៥ **តទៅទំព័រទី ១៦**


អេលីហ្សាបែត ចៅក្រម ម៉េង លីម និង និគ្សា

### A Cambodian Genocide Survivor Became the First Elected Superior Court Judge in Georgia

by Soben Pin

January 15th, 2015- Meng Lim of Tallapoosa became the first Cambodian-American elected Superior Court Judge in west Georgia. Judge Lim was born in Cambodia shortly **Continued to Page 16**

## ទីក្រុងឡូវែលមានព្រិលធ្លាក់ច្រើនជាងគេទូទាំងស.រ.អា.

**ដោយៈ Richard P.Howe Jr.,រីឆើត ភី.ហូវ ចេអ.**

**ប្រែសម្រួលដោយៈ ថាច់ វណ្ណា**

ក្នុងសភាពសិសិររដូវសព្វថ្ងៃ.ក្រុងឡូវែលបានធ្លាក់ព្រិលចំនួន៣៦អីញ្ជ៍ នេះជាសភាពខុសធម្មតា. ក្នុងខណៈដែលខ្ញុំសរសេរអត្ថបទនេះ ព្រិលបានធ្លាក់ចំនួន១១១អីញ្ជ៍លើផ្ទៃដីនៃក្រុងឡូវែល រួចនឹងមានធ្លាក់ជាច្រើនបន្តទៅទៀតធ្វើឱ្យសិសិររដូវឆ្នាំ **តទៅទំព័រទី ២២**

## Lowell: the Snowiest City in America

**By Richard P. Howe Jr.**

In a normal winter, Lowell would have received 36 inches of snow by now. But this is not a normal winter. As I write this, we already have 111 inches on the ground with more forecast for this evening. That makes the winter of 2014-15 the snowiest winter since 1891. We have so much snow this year that Lowell is also the snowiest city in the United States. As of February 16, Lowell was first with 111 inches followed by Worcester with 103 and Boston with 95. Other top cities were Buffalo, New York with 96 inches, Erie, Pennsylvania with 91 and Syracuse, New York with 86. **Continued to page22**



# នៅជួរមុខនៃពាណិជ្ជករសម័យថ្មី

**ខ្មែរផុសស.រ.អា.**

**ឡូវែលៈ** នាង ចម្បា ប៉ាង បានជាអ្នកផ្ដើមគំនិតចេញមុខរៀបចំរាត្រីសមោសរបែបថ្មីមួយកាលពីថ្ងៃសៅរ៍ទី៧ កុម្ភៈ ឆ្នាំ២០១៥ បង្ហាញពីពាណិជ្ជកម្មនៃលំអរក្នុងតំបន់តាមវប្បធម៌អាស៊ី ដែលមានឱ្យឈ្មោះថា "ពិពរណ៍នៃពិធីមង្គលការនៅឡូវែល" ។

ជាមួយមិត្តនារីបួនរូបទៀត មាន នាងស៊ីម សោម នាងសារីណា វ៉ាន់ ដាញ់ នាង ជន ស៊ីម៉ុន នឹងនាង លីនដា ម៉ណ គេបានពួតដៃគ្នារៀបបដិសណ្ឋារកិច្ច នឹងអញ្ជើញពួកពាណិជ្ជករអាស៊ីមួយក្រុមឱ្យមកតាំងតុផលិតផលរបស់ខ្លួន ជាពិសេសមានផលិតផលកែរសម្ផស្សកែរពណ៌សម្បុរស្បែក ធ្វើសក់ ធ្វើក្រចក សិល្បករថតរូបការ ជាងគំនូរ មានទាំងម្ហូបចំណី នឹងនុំបង្អែម... នៅពេលដែលក្រុមពាណិជ្ជករសម្លៀកបំពាក់មង្គលការមួយក្រុមទៀតដង្ហែរក្បួននាងគំរូតែងសំលៀកបំពាក់គ្រឿងដ៏ប្រណិតដែលគេប្រើសម្រាប់តុបតែងរូបរាងកាយកម្លោះក្រមុំក្នុងពិធីមង្គលការនៃជនជាតិអាស៊ី... គ្មានមនុស្សសំខាន់ណាម្នាក់ ឬគ្មានថ្នាក់ **តទៅទំព័រទី ០៥**


ចម្បា ប៉ាង, សារីណាវ៉ាន់ ដាញ់,លីនដា ណម, ជន ស៊ីម៉ន ,ស៊ីម សុន

# ដំណើរពីអាមេរិកទៅអាស៊ី (ភាគ៧)

តពីលេខមុន

ដោយ : ពិន សំខុន

ចេញពីប្រាសាទអង្គវត្ត ឬហៅម្យ៉ាងទៀតថាអង្គរតូចយើងនឹងបន្តដំណើរទៅអង្គរធំទៀត នៅថ្ងៃស្អែកតែយើងមានអារម្មណ៍ថា អាថិកំបាំងបានត្រូវរបើកឡើងដោយមានគេចេះអានផ្ទាំងចម្លាក់សីលាចារឹកដោយអ្នកឯកទេសសរសេរជាអក្សរសាំងស្ក្រឹត ទើបឱ្យជំនាន់ក្រោយដឹងថាប្រាសាទនេះសង់ឡើងនាសតវត្សរ៍ទី៩ ដោយព្រះបាទសុរិយាវរ្ម័នទី២ ដែលទោះជាគ្មានរូបថតសែសសល់ក្តី ក៏ព្រះអង្គបានបន្សល់ឱ្យឃើញរូបភាពដោយខ្លួនឯងតាំងពីរាប់ពាន់ឆ្នាំមុន គឺឆ្លាក់លើផ្ទាំងសីលាទុកឱ្យយើងរំលឹកស្មាដៃបុព្វបុរសជាដូនតាយើងបានដែរ ។

ស្អែកឡើងយើងបន្តដំណើររបស់យើងទៅរមនីយដ្ឋានដ៏អស្ចារ្យថ្មីមួយទៀត ដូចគ្រោងទុក តែថ្ងៃនេះអ្នកម្នាងម៉ាចជាមហេសីព្រះអង្គម្ចាស់ធម្មិកោក៏ចូលរួមជូនដំណើរយើងដែរ ធ្វើឱ្យ ប៊ុណ្ណារ៉ូសប្បាយជាងគេ ដោយបានព្រះរាជបុត្រាច្បងមួយឈ្មោះ"ចក្រ"ទៅជាមួយដែរ គ្រាន់បានរត់លេងជាមួយគ្នា ។

ពេញមួយថ្ងៃថ្មីមួយទៀត យើងផ្តោតអារម្មណ៍តែលើប្រាសាទបាយ័នដែលសង់នៅលើបរិវេណដ៏ធំមួយតែនៅមិនឆ្ងាយប៉ុន្មានពីប្រាសាទអង្គរតូចទេ ដើម្បីទៅដល់ទីនោះ គេត្រូវឆ្លងស្ពាន


អ្នកម្នាង ម៉ាច និង សុបិន្ត


ប្រាសាទបាយ័នស្នាមព្រះហស្តព្រះបាទជ័យវរ្ម័នទី៧

មិនវែងដូចមុនទេ តែអស្ចារ្យដោយរូបចម្លាក់ជាក្រុមយក្សធំៗម្ខាងដៃកាន់នាគទាញព្រ័ត្រនឹងក្រុមទេព្តាធំៗប៉ុនគ្នានៅម្ខាងទៀតកាន់នាគទាញព្រ័ត្រដូចគ្នា នៅអមសងខាងស្ពានពីមុខក្លោងទ្វារចូលបរិវេណដ៏ធំមួយគេនិយាយថា រូបនោះសំដៅទៅរកន័យទាញព្រ័ត្រកូរសមុទ្រទឹកដោះបង្កើតជាទឹកអម្រឹតដែលនឹងផ្តល់ជីវិតអមតៈដល់អ្នកដែលបានឈ្នះយកទឹកអម្រឹតនោះមកផឹកបានមុនគេ។ ចូលទៅដល់ក្នុងបរិវេណតាមក្លោងទ្វារមុខព្រហ្មដ៏ធំសម្បើមដ៏រ៉ា៣-៤ដើរទន្ទឹមគ្នាមិនចង្អៀតនឹងល្បីល្បាញដោយលំអរគ្មានពីរក្នុងលោកនៅមានប្រាសាទធំចម្លែកច្រើនទៀត ដែលសង់ឡើងមិនមែនសម្រាប់រស់នៅ ដូចជាវាំងស្តេចទេនោះ គឺជាដង្វាយព្រះដែលសង្គមមនុស្សជំនាន់នោះគេមានជំនឿយ៉ាងជាក់ច្បាស់នឹងអរគុណដល់ភាពសាកសិទ្ធនឹងមានប្រយោជន៍ដល់សង្គមដូនតារបស់យើងនៅពេលនោះ ។

ចម្លែកនឹងរំភើបណាស់ ! ត្រង់នឹកទៅដល់មនុស្សជំនាន់ដើមនាអំឡុងឆ្នាំ១១00សម្រាប់អង្គរធំ ឬមុននេះឆ្នាំ៨00សម្រាប់អង្គរតូច គេយកពេលសម្រាប់ធ្វើសំណង់ដ៏មហិមានានា ៣0-៤0-៥0ឆ្នាំ ដើម្បីសាងសង់រមនីយដ្ឋានតាមគម្រោងធំៗនៃវិស្វកម្មរបស់ស្តេចតែមួយអង្គតាំងតែពីតូចដល់ធំ រហូតដល់ចាស់ស្លាប់កូននឹងចៅកើតតមកទៀត ក៏បន្តធ្វើជាជាងសំណង់ថ្វាយស្តេចជាបន្តទៅទៀតជាច្រើនជំនាន់ ឥតឈប់ឈរ

តទៅទំព័រទី ០៤

តមកទំព័រទី ០១

# បទសម្ភាសន៍ជាមួយព្រះអង្គម្ចាស់ស៊ីសុវត្ថិ...

ដើម្បីជួបសមាជិកសមាជិកាគណបក្សនៅក្រៅប្រទេសមុននឹងបន្តទៅតំបន់ផ្សេងៗទៀត ដែលជាទីប្រជុំនៃសហគមន៍ខ្មែរព្រះអង្គបានផ្តល់បទសម្ភាសន៍ដល់ខ្មែរផុសស.រ.អាដែលភាគបន្តមានដូចតទៅ :

...**សួរៈ** ឥឡូវយើងមកដល់រជ្ជកាលថ្មីនៃព្រះបាទនរោត្តម សីហមុនី ព្រះអង្គធ្លាប់គង់នៅក្បែរព្រះកូណាមុន បន្ទាប់មកនៅក្បែរនឹងព្រះកូណាបច្ចុប្បន្ននរោត្តម សីហមុនី ដែលត្រូវការសម្តេចម៉ែជាព្រះមាតាមកជួយគ្រប់គ្រងជាតិ តើព្រះអង្គមើលឃើញថា អ្វីដែលថាល្អសម្រាប់ប្រជាជាតិគួរបន្តនឹងអ្វីដែលមិនប្រសើរ គួរកែតម្រូវ ?

**ស.ធម្មិកោៈ** ខ្ញុំហាក់ដូចជាមិនមានមើលឃើញថា មានអ្វីគួរកែប្រែទេ ពីព្រោះព្រះកូណាបច្ចុប្បន្នក៏នៅតែបំពេញរាជកិច្ចដូចតែគ្នានឹងព្រះកូណាមុនដូច្នោះដែរ ជាព្រះប្រមុខរដ្ឋ ជានិមិត្តរូបនៃឯកភាពជាតិតែអ្វីដែលខ្ញុំមើលឃើញថា គួរតែកែប្រែនោះ គឺទំនាក់ទំនងរវាងស្ថាប័នព្រះមហាក្សត្រជាមួយនឹងគណបក្សប្រជាជន យើងដឹងហើយថាគណបក្សប្រជាជនកម្ពុជាជាគណបក្សកុម្មុយនិស្ត ហើយនៅក្នុងលោកនេះមិនមានទេប្រទេសគ្រប់គ្រងដោយកុម្មុយនីស្ត ដែលជាប្រទេសរាជានិយមនោះ ដូច្នេះគោលបំណងគណបក្សប្រជាជនមានតែមួយទេ គឺបំផ្លាញរាជានិយមបំផ្លាញប្រពៃណីខ្មែរ ឧទាហរណ៍ក្នុងឋានន្តរសក្តិស្រុកខ្មែរក្នុងការផ្តល់បរមងារជាឧកញ្ញាដល់មនុស្សរាប់រយនាក់ ដែលគ្មានស្នាដៃជាវិរបុរសមិនអាចដកចេញវិញបាន គឺជាការបន្ថយតម្លៃនៃបរមងារនោះ ទោះជាឧកញ្ញាខ្លះជាប់គុកដោយអំពើឧក្រិដ្ឋក៏គេមិនដកងារនោះចេញដែរ មេដាយធំៗថ្នាក់កំពូលសម្រាប់លើកទឹកចិត្តអ្នកដែលមានស្នាដៃស្នេហាជួយជាតិបានត្រូវគេយកទៅចែកគ្នាដូចចែកនំ នេះគឺការបន្ថោកតម្លៃស្នាដៃនៃអ្នកស្នេហាជាតិមួយទៀតសម្តេចសង្ឃខ្មែរដែលថាលះបង់អស់ហើយនោះ តែមានសង់កុដិល្អមិនចាញ់វាំងទេ ហើយថែមទាំងមានពាក់ឥស្សរិយយសផង ខ្ញុំព្រះរាជគណសង្ឃមិនប្រើសង្ឃស័ព្ទទេតែប្រើរាជស័ព្ទទៅវិញ... ។

**សួរៈ** តើមានច្បាប់ក្បួនឯណាមិនឱ្យសម្តេចសង្ឃប្រើរាជស័ព្ទឬទេ?

**ស.ធម្មិកោៈ** ខ្មែរយើងមានភាសារាស្ត្រសង្ឃស័ព្ទមានរាជស័ព្ទដែលភាសាទាំងនោះមិនលាយឡំចូលគ្នាទេ ដែលតាមពិតទៅព្រះរាជក្រឹត្យតែងតាំងសម្តេចសង្ឃអនុញ្ញាត្តិឱ្យប្រើរាជស័ព្ទតែ៤អង្គទេ ដូច្នេះបើប្រើរាជស័ព្ទជាទូទៅទៅហើយមានពាក់គ្រឿងឥស្សរិយយសស៊ីវិលទៅទៀត វាខុសនឹងវិន័យអស់ហើយ បានន័យថាធ្វើនេះបន្ថោកតម្លៃនៃរាជានិយមនឹងសាសនាខ្មែរ ។

**សួរៈ** នរណាជាអ្នកតែងតាំងចេញព្រះរាជក្រឹត្យឱ្យគណសង្ឃឱ្យឧកញ្ញាទាំអស់នោះ?

**ស.ធម្មិកោៈ** ចា ! អានេះធ្វើតាមការស្នើរបស់រាជរដ្ឋាភិបាលទាំងអស់ព្រះមហាក្សត្រចង់ ឬមិនចង់ក៏នៅមានប្រមុខរដ្ឋស្តីទីចុះហត្ថលេខាលើព្រះរាជក្រិត្យជំនួសបានដែរ ។ ៩៩ភាគរយនៃមនុស្សដែលបានទទួលការតែងតាំងសុទ្ធតែមានការស្នើពីរាជរដ្ឋាភិបាល ។ ខ្ញុំចង់បន្ថែមបន្តិចទៀតថា សម្តេចសង្ឃរាជខ្មែរសុទ្ធតែបានទទួលការស្រោចទឹកពីសំណាក់ ប៊ុន រ៉ានី ហ៊ុន សែន ទាំងអស់នេះជាការចម្លែកមួយទៀត ដែលវិន័យនៃសង្ឃខ្មែរមិនដែលមានឱ្យស្ត្រីស្រោចទឹកឱ្យបានទេ នេះហៅថាយុទ្ធសាស្ត្រដែលធ្វើដោយចេតនាដើម្បីបន្សាបសាសនាខ្មែរ... ។

**សួរៈ** ត្រឡប់មករឿងនយោបាយវិញ ដោយ


ក្រុមយុវជនសង្គ្រោះជាតិច្រៀងចំរៀងស្នេហាជាតិ

សារព្រះអង្គចូលជាថ្នាក់ដឹកនាំនៃយុទ្ធសាស្ត្រគណបក្សសង្គ្រោះជាតិ ហើយនៅពេលដែលគណបក្សសង្គ្រោះជាតិបានសម្លេងភាគច្រើនពីរាស្ត្រតែមិនបានឈ្នះឆ្នោតស្ថានភាពនេះបានធ្វើឱ្យគណបក្សព្រះអង្គសម្រេចចិត្តទទួលលទ្ធផលនេះក្នុងលក្ខខណ្ឌតែមួយគត់គឺ កែរគណកម្មការជាតិសម្រាប់


ព្រះអង្គម្ចាស់ស៊ី.នៅហ្វីឡាដែលហ្វៀ

ការបោះឆ្នោតឱ្យបានត្រឹមត្រូវសួរថា នៅឆ្នាំ២០១៨នឹងមានការបោះឆ្នោតម្តងទៀត ប្រសិនបើគណៈកម្មការបោះឆ្នោតប្រកាសដូចបំណងថា គណបក្សសង្គ្រោះជាតិ "ឈ្នះ" តើក្នុងនាមព្រះអង្គជាអ្នកយុទ្ធសាស្ត្រ តើនឹងយកអំណាចមកកាន់បានដោយវិធីណា ?

**ស.ធម្មិកោៈ** គណបក្សសង្គ្រោះជាតិកំពុងតែរៀបចំធនធានមនុស្សជុំវិញការទៅកាន់រដ្ឋាភិបាលរៀបចំផែនការដើម្បីឱ្យការបោះឆ្នោតឃុំសង្កាត់នៅឆ្នាំ២០១៧ឱ្យបានជ័យជំនះសង្គ្រោះជាតិចង់បានធ្វើការប្រជុំមួយចង់បង្កើតច្បាប់រចនាសម្ព័ន្ធជារដ្ឋាភិបាលស្រមោល ដូចនៅអង់គ្លេស ឬអូស្ត្រាលីតែលោក ហ៊ុន សែន មិនព្រមទេ តែយើងនៅតែរៀបចំរចនាសម្ព័ន្ធរដ្ឋាភិបាលទទួលខុសត្រូវទទឹមនឹងរដ្ឋាភិបាលនៅក្នុងគណកម្មការកណ្តាលយើង ដើម្បីពង្រឹងធនធានមនុស្សរបស់យើងដូចរដ្ឋាភិបាលដែរ ដូច្នេះពេលវេលាមកដល់យើងនឹងមានធនធានមនុស្សរួចជាស្រេចសម្រាប់ទទួលកាងារប្រទេស ។

**សួរៈ** ក៏ប៉ុន្តែលោក ហ៊ុន សែន នៅមានទាហ៊ានក្នុងដៃរឹងមាំនៅឡើយ មានរចនាសម្ព័ន្ធសេដ្ឋកិច្ចរឹងមាំមានប្រជាជនគាំទ្រមួយចំនួន ដោយសារផលប្រយោជន៍ផ្ទាល់ខ្លួនស្ថិតនៅជាជន្ទល់ក្អែងបន្លំបង្ហាញជារូបភាពជាប្រជាធិបតេយ្យ ដើម្បីការពារអំណាចរបស់គេ តើសង្គ្រោះជាតិនឹងកែសង្គមនោះ របៀបណា ?

**ស.ធម្មិកោៈ** ជាទស្សនៈផ្ទាល់ខ្លួនរបស់ខ្ញុំយើងដឹងហើយថា ដើម្បីយកអំណាចមកកាន់ហើយកែរសង្គមបានយ៉ាងហោចណាស់ក៏ត្រូវការពេល២អាណត្តិដែរ អាទិភាពសំដៅទៅការបោសសំអាតនៅក្នុងវិស័យ២ គឺអប់រំនឹងសុខាភិបាលដើម្បីឱ្យអភិវឌ្ឍន៍ទៅបាន ចំណែកវិស័យឯទៀតៗយើងក៏ត្រូវតែធ្វើដែរ តែធ្វើតែតាមទៅបាន ។

**សួរៈ** ត្រង់ហ្នឹងហើយដែលជាបញ្ហា! សួរថាដើម្បីទៅកាន់អំណាច ហើយកែសង្គមបាននោះតើគណបក្សប្រជាជនកម្ពុជា ព្រមប្រគល់អំណាចឱ្យសង្គ្រោះជាតិដែរ ឬទេ ?

**ស.ធម្មិកោៈ** គណបក្សប្រជាជនមានផ្លូវ



ជ្រើសរើសតែ២ទេ គឺ១ យល់ព្រមប្រគល់អំណាច ២-ប្រកាសធ្វើរដ្ឋប្រហារលើរដ្ឋធម្មនុញ្ញ ខ្ញុំមិនជឿថា គណបក្សប្រជាជនហ៊ានធ្វើទៅដល់ជំហ៊ានទី២នោះទេ ពេលនោះគណបក្សប្រជាជននឹងទទួលខុសត្រូវលើការបង្ហូរឈាមនៅក្នុងប្រទេសមួយហេតុអ្វីបានជាខ្ញុំថាដូច្នោះ កាលពីបោះឆ្នោតឆ្នាំ២០១៣ គណបក្សសង្គ្រោះជាតិប្រកាសថាយើងឈ្នះតែគ.ជ.ប. ប្រកាសថាយើងបានតែ៥៥អាសនៈ ទល់នឹង៦៣អាសនៈរបស់គណបក្សប្រជាជន ហេតុអ្វីក៏មិនយកអំណាចនៅពេលហ្នឹងនោះពីព្រោះតែតួលេខនៅដៃគេទាំងអស់យើងគ្មានភស្តុតាងអ្វីនៅដៃសម្រាប់បង្ហាញរាស្ត្របង្ហាញសហគមន៍អន្តរជាតិទេ តែនៅឆ្នាំ២០១៨ បើមានរឿងនេះកើតឡើងគណបក្សប្រជាជននឹងលោក ហ៊ុន សែន នឹងគ្មាននរណាគាំទ្របានទៀតទេ ទាំងទាហ៊ានគាត់នឹងទាំងអន្តរជាតិ បើយើងហ៊ានជម្រុញបាតុកម្មរហូតដល់ការបង្ហូរឈាមផ្ទុះឡើង ថ្នាក់ដឹកនាំយើងអាចនឹងត្រូវគេសម្លាប់ ឬចាប់ខ្លួនចោទប្រកាន់ថា ចង់រំលំរដ្ឋាភិបាលស្របច្បាប់របស់គេពេលនោះយើងអាចនឹងយកពេលសម្រាប់ដោះស្រាយយ៉ាងហោចណាស់២០ឆ្នាំទៀតដែរ តើយើងគួរចំណាយពេលរបៀបនេះដែរឬទេ?

**សួរៈ** កាលពីចុងឆ្នាំ២០១៣ នៅក្នុងបាតុកម្មសង្គ្រោះជាតិដ៏ធំបង្អស់មួយមានឧត្តមសេនីយកងទ័ពបានចេញមកបង្ហាញខ្លួនថាពួកគេមិនមែនមកសម្លាប់ពលរដ្ឋខ្លួនឯងទេ គឺសម្រាប់តែការពារជាតិតែប៉ុណ្ណោះ នេះធ្វើឱ្យយល់ថាបើមានចំនួនតិចមិនមាននរណាហ៊ានបញ្ចេញឆន្ទៈដូចនេះទេខ្ញុំនឹកទៅដល់អតីតយោធាខ្មែរក្រហមអតីតយោធាអ្នកតស៊ូ ដែលមានចំនួនច្រើនក្នុងជួរកងទ័ពលោកហ៊ុន សែន នៅឡើយ តើលោក ហ៊ុន សែន នៅតែហ៊ានសង្ឃឹមលើកងទ័ពស្មោះត្រង់ខ្លួនបានទៀតឬទេ?

**ស.ធម្មិកោៈ** ទ័ពទាំងនោះច្រើនតែអតីតខ្មែរក្រហម រីឯទ័ពអ្នកតស៊ូត្រូវគេរំសាយអស់ច្រើនហើយតាំងពីសម័យសមាហរណកម្មម្លេះ...

**សួរៈ** តើមានសញ្ញាណាមួយទេថា លោក ហ៊ុន សែន ប្តើមបន្ទន់ឥរិយាបទសម្រាប់ត្រៀមទទួលយកការចាញ់ឆ្នោតឬទេ ?

តទៅទំព័រទី ០៦

តមកពីទំព័រទី ០២

## ដំណើរពីអាមេរិកទៅអាស៊ី...

នៅលើថ្មដែលធ្លាក់ហើយក៏នៅមានបន្ទល់រូបផ្សេងៗទៀត ដែលនិយាយពីជីវិតរាល់ថ្ងៃនៃប្រជាពលរដ្ឋធម្មតា មានអ្នកនេសាទ អ្នកលក់ដូរអ្នកសិល្បៈរបាំភ្លេង គ្រូព្យាបាល អ្នកចម្បាំង មន្ត្រីដែលយើងស្ងើចសសើរពីបំណងផ្សព្វផ្សាយជាព័ត៌មាននៃអ្នកជំនាន់នោះពីសតវត្សទី៦-១៣ សម្រាប់ជូនជាព័ត៌មានដល់ពលរដ្ឋ -ខុសគ្នាអីតែជំនាន់"ខ្មែរស្រឡាញ់ជាតិខ្មែរ"នៃរបបសមមិត្តប៉ុល ពត ក្នុងសតវត្សទី២០-២១ គេបំផ្លាញព័ត៌មានសម្រាប់ពលរដ្ឋដឹងឮអស់រលីងពីលើទឹកដីនឹងពីខួរក្បាលមនុស្ស? គួរឱ្យសោកស្តាយ! រហូតមកដល់ពេលនេះព័ត៌មាននៅលើផ្ទាំងសិលាទាំងនោះ ក៏នៅតែជាចំណោះមិនចេះរីងស្ងួតរបស់មនុស្សជំនាន់ក្រោយនៅឡើយ ។

ថ្ងៃនេះ ជាមួយអ្នកម្នាងម៉ាចនឹងព្រះអង្គម្ចាស់តូច"ចក្រ"អាយុ៦ឆ្នាំ យើងមានគំនិតថ្មីៗច្រើនទៀត សម្រាប់ថតរូបសម្រាប់យល់ពីបុរាណវិទ្យាសម្រាប់យល់ពីបំណងនៃជាងនោះ ពេលធ្លាក់រូបនិមួយនៅលើថ្ម ពីព្រោះអ្នកម្នាងជាអ្នកសិល្បៈឆ្នៃប្រឌិតសិប្បកម្មចម្លាក់លើថ្មលើឈើ ឬលើដែកបន្ទះច្រើនឆ្នាំយើងនិយាយកំប្លែងលេងយ៉ាងរីករាយធ្វើឱ្យពេលវេលាទៅមុខយ៉ាងលឿនទប់មិនជាប់ ។ ប្រាសាទបាយ័ន ឬហៅមួយទៀតថា"អង្គរធំ" គឺជាសំណង់នៃមុខព្រះឥន្ទ៤លើព្រះកេស្តតែមួយព្រះភក្ត្រនិមួយៗញញឹមយ៉ាងស្ងប់ស្ងៀមចុះក្រោមមុខព្រះព្រហ្មទាំងនោះ បានត្រូវអ្នកបុរាណវិទ្យាជំនាន់ក្រោយនិយាយថា គេនិយាយថាមានមុខ១២៣ គឺជាព្រះភក្ត្រស្តេចស្ថាបត្យករនៃស្តេចតែមួយព្រះអង្គគត់ គឺព្រះបាទជ័យវរ្ម័នទី៧ តែម្តង តែយើងនៅតែមិនយល់នៅឡើយថាស្តេចអង្គដ៏ល្បីល្បាញនេះ ជាស្តេចតែមួយអង្គឯងគត់ នាជំនាន់មុនវិបត្តិនៅ"អង្គរ"ដែលជាអ្នកកាន់ព្រះពុទ្ធសាសនាដ៏ជ្រាលជ្រៅសោះ ហេតុអ្វីក៏ទៅសង់រូបតំណាងព្រះព្រហ្មទៅវិញ? យើងបានទទួលចម្លើយមួយពីការស្រាវជ្រាវរបស់ មិសែលត្រាណេ អ្នកបុរាណវិទ្យាខ្មែរម្នាក់ថា ព្រះបាទជ័យវរ្ម័នទី៧ បានឱ្យឈ្មោះខ្លួនឯងថា ធនជ័យចំណែកឯព្រះពុទ្ធសាសនា នៃព្រះបាទជ័យវរ្ម័នទី៧ មិនដូចព្រះពុទ្ធសាសនាខ្មែរសព្វថ្ងៃនេះទេ គឺជាព្រះពុទ្ធសាសនាបែបមហាយានលាយនឹងមហិទ្ធិរិទ្ធបែបព្រហ្មញ្ញសាសនាកាប់មិនមុតដុតមិនឆេះឯណោះទេ។ ចម្លើយនេះក៏មិនទាន់គ្រប់គ្រាន់នឹងពន្យល់សំនួរថា ហេតុអ្វីក៏ស្តេចជំនាន់ក្រោយស្អប់ជ័យវរ្ម័នទី៧ រហូតដល់ឱ្យបញ្ជាឱ្យឆ្លាក់រូប"ស្តេចគម្លង់"បង្អាប់ជារូបជ័យវរ្ម័នទី៧ ហើយប្រមូលចម្លាក់រូបល្អៗស្តេចអង្គនោះ យកទៅបំផ្លាញ ឬកប់ចោលទៅវិញ បើព្រះអង្គលើកដំកើងរូបព្រះព្រហ្មដែរនោះ ?

យើងបានដើរព័ទ្ធ១ជុំបាស្រាទបាយ័នមើលជ្រុងចេញពីប្រាសាទតាមទិសទាំង៤ ឃើញនៅសល់ថ្មជាច្រើនទៀត ដែលមិនទាន់រកកន្លែងដាក់ទៅកន្លែងដើមបាននៅឡើយ ថ្មសែសសល់ទាំងនោះ ខ្លះមានចារុលេខចំណាំខ្លះហើយ នៅរាយពេញទីធ្លាជុំវិញប្រសាទនៅឡើយ ។ យើងបានឆ្លៀតពេលនាំកូនប្រពន្ធជិះដំរីកំសាន្តនៅក្រៅបរិវេណជាលើកដំបូងបង្អស់ដោយទ្រមាក់នាំឱ្យដើរជុំវិញប្រាសាទបាយ័នមើលទេសភាពពីលើខ្នងដំរី មានអារម្មណ៍ជាកងទ័ពដំរីដែលមិនទាន់ចេះច្បាំងនៅឡើយ ខ្លាចធ្លាក់ពីលើដំរីដែលដើរ

តទៅទំព័រទី ០៥

## តមកពីទំព័រទី ០៤ ដំណើរពីអាមេរិកទៅអាស៊ី...

ឃ្លីងឃ្លោងត្រីយើងស្ទើរបាក់ចង្កេះតែនៅតែរីករាយដោយបានភ្លក់រស់ជាតិជិះដំរីដ៏ថ្មីបំផុត




នៅឡើយ ។

ស្អែកឡើងយើងត្រឡប់មករមនីយដ្ឋានអង្គរជាថ្មីម្តងទៀត តែលើកនេះជាការទស្សនាថ្ងៃចុងក្រោយយើងឱ្យរ៉ឺម៉កម៉ូតូនាំយើងទៅមើលប្រាសាទនៅជុំ ធំ មួយជុំ មានប្រសាទតាព្រហ្ម ប្រាសាទបន្ទាយក្តីប្រាសាទព្រះខ័ន ប្រាសាទនាគព័ន្ធ ស្រះស្រង់... ។ល ។ ដែលមានសោភ័ណ្ឌភាពនឹងប្រវត្តិឧទ្ទិសដល់មនុស្សដែលមានគុណចំពោះស្តេច នឹងចំពោះប្រទេសខុសៗគ្នា តែសម្រាប់ថ្ងៃនេះយើងពុំមានពេលច្រើនសម្រាប់ទស្សនាប្រាង្គ



ប្រាសាទនិមួយៗទេ។

ដោយសារយប់នេះ ជាយប់ទី៤ នៃដំណើរមកដល់សៀមរាបយើងនៅសល់ស្អែក១ថ្ងៃទៀតដែរ សំរាប់ដើរកំសាន្តក្នុងក្រុងសៀមរាបឱ្យស្គាល់ក្រុងដ៏ល្អនេះផង យើងនាំគ្នាទៅចូលរួមភោជនាហារល្ងាចទាំងជាង២០នាក់ នៅសណ្ឋាគារដែលក្រុមអ្នកមកពីស្រុកបារាំងសំណាក់នៅជុំគ្នា ពេលនោះទើបយើងដឹងថា ពួកអ្នកឯទៀត ជិះរថយន្ត"មីនីប៊ើស"ទៅកំសាន្តរមនីយដ្ឋាន"អង្គរវត្ត" ពេញ៣ថ្ងៃដូចយើងដែរ ម្នាក់មានសំដែងការរីករាយឥតឧបមាដោយបានទស្សនាប្រាសាទបូរាណដ៏ស្កុកស្គមគ្មាន២របស់ពូជពង្សខ្មែរ ។ ក្នុង៣ថ្ងៃកន្លងទៅនេះ ទោះជាយើងមកជាមួយគ្នាមែនតែមិនបានជួបគ្នាទេ ដោយទៅទស្សនាប្រាសាទនានាផ្សេងពីគ្នាតែទទួលបាននូវចំណេះនឹងបទពីសោធន៍ថ្មីនៃឫសគល់ប្រជាជនខ្មែរ ជាលើកដំបូងដូចគ្នា ។ ចំណេះថ្មីទាំងនេះ បានធ្វើឱ្យអ្នកដំណើរទាំងអស់សោមនស្សចង់តាមដានបន្តទៅទៀតមិនឈប់បានធ្វើឱ្យវាមពលនៃការចង់


ប៉ុណ្ណារ៉ូ និង ចក្រ សម្រាកបន្តិចសិនមុននឹងរត់តទៅទៀត

ទស្សនានឹងកម្លាំងចិត្តផុសផុលឡើងខ្ពស់ផ្ទុយពីគំនិតថាដើរច្រើននាំឱ្យនឿយហត់ទៅវិញនោះទេ។ យ៉ាងហោចណាស់ នេះគឺជាបទពិសោធន៍របស់សូបិន ដែលធ្លាប់តែត្អូញត្អែពីការនឿយហត់នៅពេលដើរច្រើនម្តងៗនឹងប៉ុណ្ណារ៉ូ ដែលប៉ុន្មានថ្ងៃចុងក្រោយនេះរត់នឹងលោតពីថ្មប្រាសាទមួយជុំទៅមួយជុំទៀត បានថតចម្លងជាថ្មីទៀត នូវការចងចាំថ្មីនេះប្រចាំជីវិត ។

យើងដើរទស្សនាក្រុងវប្បធម៌ខ្មែរ គឺសៀមរាបពេញមួយថ្ងៃស្អែកឡើងនាំគ្នាឡើងឡាន "ប៊ើស"ធំមួយទៀត ចេញដំណើរប្រមាណជា ៣០០គម។ សំដៅមកក្រុងភ្នំពេញវិញ ដោយកាត់តាមកំពង់ធំឈប់ហូបបាយថ្ងៃត្រង់នៅកណ្តាលក្រុងតែមិនបានចូលទៅមើលប្រជុំប្រាសាទ "សម្បូរព្រៃគុក" ពីក្រុងចាស់ខ្មែរដ៏ធំមួយទៀត ផ្តើមសង់មុនអង្គរវត្តប្រមាណជា៥សតវត្ស គឺពីអំឡុងឆ្នាំ៣០០ដល់សតវត្សទី៦សង់ពីថ្មដីឥដ្ឋដែលស្ថិតនៅក្បែរនោះគួរឱ្យស្តាយ! យើងបន្តដំណើរកាត់តាមកំពង់ចាមមកដល់ស្គន់យើងចុះស្រស់ស្រូបរួចបន្តរដំណើរកាត់បាធាយឆ្លងស្ពានព្រែកក្តាមដែលពី១២ឆ្នាំ មានស្ពានតែ២គត់កាត់ទន្លេនៅក្រុងភ្នំពេញ ឥឡូវមានបន្ថែមស្ពានព្រែកក្តាមនេះមួយទៀត ដែលសម្រួលជីវភាពប្រជាជនបានច្រើនឮថាមានស្ពាន"ទន្លេបិត"នៅកំពុងចាមដ៏មានប្រយោជន៍បានសង់ហើយនឹងស្ពាន"អ្នកលឿង" ទៅស្វាយរៀង។ យើងមកដល់ភ្នំពេញវិញ រួចហើយត្រៀមខ្លួនបែកគ្នាឡើងយន្តហោះត្រឡប់ទៅផ្ទះតែរៀងៗខ្លួន ។

ចំណែកគ្រួសារខ្ញុំមិនទាន់បញ្ចប់ដំណើរនៅអាស៊ី តែត្រឹមនេះនៅឡើយទេ ត្រូវទៅស្រុកយួនជួបគ្រួសារសូបិននៅកម្ពុជាក្រោម ហើយខ្ញុំត្រូវត្រឡប់មកតែម្នាក់ឯងមកការកូនមួយទៀតនៅ២អាទិត្យក្រោយមកមុននឹងបន្តរដំណើរទៅហុងកុងទៀត ៕ **(សូមអានភាគបន្តនៅភាគទី៨ ទៀត)**

តមកពីទំព័រទី ០៣ បទសម្ភាសន៍ជាមួយព្រះអង្គម្ចាស់ស៊ីសុវត្ថិ...

**ស.ធម្មិកោ:** ខ្ញុំមិនជឿថាលោក ហ៊ុន សែន នឹងជ្រើសយកផ្លូវធ្វើរដ្ឋប្រហារតាមយោធាទេ លោក ហ៊ុន សែន កំពុងត្រូវអង្គការសង្គមស៊ីវិលមួយដាក់ពាក្យប្ដឹងទៅតុលាការព្រហ្មទណ្ឌអន្តរជាតិ សំណុំរឿងហ្នឹងទៅដល់តុលាការហើយ ខ្ញុំយល់ថាយកល្អលោក ហ៊ុន សែន គួរតែយកពេលចរចារសម្រាប់ឱ្យអាចមានអភ័យឯកសិទ្ធិសម្រាប់ពេលខ្លួនអស់អំណាចទៅវិញទៅ ពីព្រោះតែនៅឆ្នាំ២០១៨ បើកាលណា គ.ជ.ប. ប្រកាសថា សង្គ្រោះជាតិឈ្នះ គឺគណបក្សប្រជាជនទេដែលនឹងប្រកាសមិនទទួលស្គាល់លទ្ធផលនៃការបោះឆ្នោត មិនមែនគណបក្សសង្គ្រោះជាតិទេ ហើយបើលោក ហ៊ុន សែន នៅតែហ៊ានប្រើយោធា ខ្ញុំមិនជឿថា អាចទប់កម្លាំងយុវជនបានដូចឆ្នាំ២០១៣ទៀតទេ ។

**សួរ:** ក្នុងបច្ចុប្បន្ននេះ លោក ហ៊ុន សែន ហាក់ដូចជាពង្រឹងប្រើការកាចសាហាវរបស់គាត់មកវិញ តើហេតុអ្វីទៅ?

**ស.ធម្មិកោ:** ពីព្រោះគណបក្សសង្គ្រោះជាតិពុំបានបន្ទន់ជំហ៊ររបស់ខ្លួន ចំពោះរឿងវិសោធនកម្មលើច្បាប់បោះឆ្នោត ។ ពួកគាត់ខាងប្រជាជនធ្វើច្បាប់ដើម្បីការពារប្រយោជន៍ខ្លួន រីឯខាងសង្គ្រោះជាតិធ្វើច្បាប់បោះឆ្នោតសម្រាប់ប្រទេសគណបក្សក្រោយណាមកធ្វើនយោបាយប្រើច្បាប់ថ្មីនោះបានទាំងអស់នេះហើយដែលធ្វើអោយគាត់ខឹងសម្បារ ពីព្រោះច្បាប់នេះនឹងធ្វើមិនអោយគាត់លួចឆ្នោតបានទៀតទេ ហើយគាត់ក៏ចង់បង្ហាញទៅមូលដ្ឋានគាត់ថា នៅមានមូលដ្ឋាននៅមាំទាំនៅឡើយ...

**សួរ:** ខ្ញុំចង់ដឹងថា តើគណបក្សប្រជាជននៅប្រមូលគ្នាមូលជុំវិញលោក ហ៊ុន សែន ដដែលដែរឬទេ? ឬក៏មានគេចូលចិត្តថា បើចាញ់ក៏អាចនៅជាបក្សប្រឆាំងបានដែរ មិនមែនចេះតែចង់ធ្វើរដ្ឋប្រហារនោះទេ?

**ស.ធម្មិកោ:** វាតែងតែមានហើយ តែខ្ញុំមិនហ៊ានអះអាងទេ! ក៏ប៉ុន្តែតាមខ្ញុំចាំគណបក្សកុម្មុនីស្តតែកាលណាបែកបាក់គ្នាហើយ តែងតែដួលរលំតែម្តង ដូចជានៅអឺរ៉ុបខាងកើតមានប៉ូឡូញ ឆេកូ ឬប្រទេសរុស្សីដែលបែកគ្នាជាមួយ "ហ្គ័របាឆហ្វ"ជាដើមបានត្រូវរលាយបែកខ្ទេច ដូច្នេះនៅស្រុកយើងវិញ ខ្ញុំគិតថាគណបក្សប្រជាជនគេបង្ហាញការរួបរួមលាក់បាំងមិនអោយឃើញការបែកបាក់ ដើម្បីការពារផលប្រយោជន៍របស់ក្រុមគេ ទោះជាគេមិនចង់រួមគំនិតនឹង ហ៊ុន សែន ក៏ដោយ ។

**សួរ:** លោក សម រង្ស៊ី ធ្លាប់និយាយច្រើនដងហើយថា គណបក្សប្រជាជន ក៏មាន អ្នកល្អដែរ តើព្រះអង្គម្ចាស់ដឹងទេថា លោកចង់និយាយពីនរណាមួយ ?

តទៅទំព័រទី ១៧


ប្រជាពលរដ្ឋនៅញូយ៉កស្ដាប់សន្ទរកថា ទ្រង់ស៊ី ធម្មិកោ

# ក្រោយថ្ងៃបុណ្យ វីល្លីណថាញ





"Having the snow fall on our Valentine's Day wedding just made it that much more special and beautiful, Rita Savard and Carl Johnson.."

Photos by Tory Germann

**ដោយ: ថាច់ វណ្ណា**

ប្រទេសកម្ពុជាពុំបានធ្វើឱ្យពេញលក្ខណៈជាថ្ងៃបុណ្យវីល្លីណថាញនោះទេ ព្រោះមានមូលហេតុជាច្រើនបណ្តាលឱ្យមានការយល់ច្រឡំពីអត្ថន័យវីល្លីណថាញ និងរូបសញ្ញា "បេះដូង" ទុកថា ជាសញ្ញាដំណាង ឱ្យស្នេហា ឬទុកថ្ងៃ

បុណ្យវីល្លីណថាញជាថ្ងៃបុណ្យសង្សារទៅវិញ,នោះជាការបកស្រាយដោយមិនប្រយ័ត្នប្រយែងពីពាក្យ (Valentine) ទៅជាពាក្យសង្សារ ឬជាទំនងផ្តល់នៅក្តីស្រឡាញ់ដល់អ្នកណាម្នាក់ដែលគេសង្ឃឹមថា និងបានរៀបការជាមួយ។ ប្រជារាស្ត្រខ្មែរជាច្រើនយល់ថា: ថ្ងៃបុណ្យវីល្លីណថាញជាថ្ងៃបុណ្យសង្សារ ម្ល៉ោះហើយពួកគេត្រូវផ្តល់នៅ

សេចក្តីស្នេហាបរិសុទ្ធដល់គូសង្សាររបស់ពួកគេ រហូតនាំឱ្យមានការបាត់បង់ព្រហ្មចារី ឬបណ្តាលឱ្យមានការចាប់បង្ខំ



"Our first of several Valentine's days. Many more years to come, many more memories to create and cherish, Chantol Tiv"

និងរំលោភជាដើម ។

ជាការពិតបុណ្យវីល្លីណថាញ គេបានធ្វើទៅតាមទម្លាប់នៃសាសនាគ្រីស្តវីល្លីណថាញ គឺជាឈ្មោះរបស់សាវកម្នាក់ឈ្មោះ (Saint Valentinus) តាមភាសាឡាតីនអង់គ្លេសហៅថា (Saint Valentine) គឺព្រះវីល្លីណថាញ។ ព្រះសាវក វីល្លីណ ថាញ បានបរិច្ចាកជីវិតដោយបានប្រឆាំង និងច្បាប់ហាមមិនឱ្យរៀបការជាមួយទាហាន និងមនុស្សទោសនៅនគររ៉ូម (Italy) កាលពីឆ្នាំគ.ស.២៦៩។ ក្រោយមកបុណ្យវីល្លីណថាញគេបានបង្កើតឡើង ដោយសម្តេចសង្ឃ (Pope Gelasius I ) ផប ហ្គេឡាស៊ីអើស (ទី១)

ផ្តើមនៅថ្ងៃទី១៤ កុម្ភៈ ឆ្នាំគ.ស.៤៩៦។ បុណ្យនេះមានកម្មវិធីជប់លៀង ក្រុមសាវក, ការពន្លែងសត្វស្លាប,ជូនផ្កាកូលាបដល់អ្នកជាទីស្រឡាញ់គោរពរាប់អាន,ជូនក្តាអុក និងកូនអុកដល់ជនពិការ និងអំណោយផ្សេងៗជាច្រើនផ្តល់ឱ្យបរិស័ទគ្រីស្តសាសនិក ។ បុណ្យនេះបានផ្សប់ផ្សាយពាសពេញលើពិភពលោករួចប្រទេសនិមួយៗបានកំណត់ថ្ងៃបុណ្យខុសៗពីគ្នា ក្រៅពីថ្ងៃទី១៤កុម្ភៈ នៅមានថ្ងៃ៧ មករា,ថ្ងៃទី៦, ទី២៦ និងទី៣០ ខែកក្កដា, មានថ្ងៃទី៣ខែវិច្ឆិកា ទៀតផង។



រហូតមកសព្វថ្ងៃ,ប្រទេសកម្ពុជាមានប្រជារាស្ត្រ៩០%កាន់លទ្ធិពុទ្ធសាសនា, ម្លោះហើយមិនបានយល់ច្បាស់ពីបុណ្យវីល្លីណថាញក្នុងសាសនាគ្រីស្តនោះឡើយ តាមការស្រាវជ្រាវរបស់លោក តុង សុប្រាជ អ្នកកាសែតភ្នំពេញប៉ុស្តិ៍ បានរៀបរាប់ថា: រៀងរាល់ថ្ងៃបុណ្យវីល្លីណថាញ តាំងពីឆ្នាំ២០០៩ រហូតដល់ឆ្នាំ២០១៤,គាត់បានធ្វើកិច្ចសម្ភាសន៍ជាមួយយុវជនចំនួន៧១៥រូប ដែលមានអាយុពី១៥ទៅ២៤ឆ្នាំ, បានរកឃើញចម្លើយថា: មានយុវជន២/៣ បានបង្ខំសង្សាររបស់ពួកគេឱ្យធ្វើការសេពសន្ថវះក្នុងថ្ងៃបុណ្យវីល្លីណថាញក្នុងឆ្នាំ២០០៩, រហូតមកឆ្នាំ២០១៤កន្លងទៅមានយុវជនចំនួន៣៧៦នាក់ ដែលត្រូវបានទទួលការខុសត្រូវក្នុងការសេពសន្ថវៈថ្ងៃបុណ្យវីល្លីណថាញក្នុងនោះ មានចំនួន៤៧% បានខ្សិបខ្សៀវថា: ពួកគេយល់ស្របនិងបញ្ឈប់ការសេពសន្ថវះដោយបង្ខំក្នុងថ្ងៃបុណ្យវីល្លីណថាញ ។ ពួកគេបានប្រើវិធីជាច្រើនយ៉ាងដើម្បីលួងលោមយុវនារីឱ្យចូលទៅក្នុងអន្ទាក់របស់ពួកគេមានខ្លះនិយាយថា : បើសិនយើងមិនធ្វើការសេពសន្ថវៈទេនោះ,មិនមានន័យថា យើងស្រឡាញ់គ្នាឡើយ, និយាយបែបនេះធ្វើឱ្យដៃគូរបស់ពួកគេរកពាក្យឆ្លើយមិនរួច,ខ្លះទៀត បាននិយាយថា: គេបាននាំនាងទៅដំបន់ដាច់ស្រយ៉ាលរួចបង្ខំឱ្យនាងធ្វើការសេពសន្ថវះ,មួយចំនួនទៀតនិយាយថា:ពួកគេបានផ្តល់អំណោយជាច្រើនដើម្បីលួងចិត្តនាងក្នុងបំណងធ្វើការសេពសន្ថវះ ។ លោកតុងបានបន្ថែមថា: យុវជនជាច្រើនមិនបានដឹងពីប្រវត្តិបុណ្យវីល្លីណថាញនោះឡើយ ពួកគេក៏បានកំណត់ថាជាថ្ងៃបុណ្យសង្សារ ដើម្បីជាកត្តាបន្ថែមនាំឱ្យមានប្រតិកម្មផ្នែកសេពសន្ថវះ៕

# លោកគ្រូពេទ្យ ឆាន ទូច ត្រឡប់ទៅរកប្រភពដើម(ត)

**ដោយ : ខ្មែរប៉ុស ស.រ.អា.**

នៅពេលត្រឡប់ទៅដល់អតីតជុំរំជនភៀសខ្លួន ខាវ អ៊ីដង នាថ្ងៃទី៩មករា២០១៥ ដែលបានត្រូវបិទជាស្ថាពរកាលពី២៦ឆ្នាំមុន លោកគ្រូពេទ្យ ឆាន ទូច បានជម្រះបញ្ចើអារម្មណ៍អរគុណដល់ទឹកដីដែលអនុញ្ញាតិឱ្យលោករក្សាជីវិតបាន៤ឆ្នាំនឹង១ខែ នៅទីនោះ មុននឹងបន្តដំណើរមកសហរដ្ឋអាមេរិក នាថ្ងៃចុងក្រោយបង្អស់ដែលជីវិតជុំរំត្រូវបញ្ចប់ ។ លោក ឆាន ឱនជួសបានដីមួយកូនដបនាំមកជាប់នឹងខ្លួនសម្រក់ទឹកភ្នែកជាមួយចាស់ទុំថៃម្នាក់ ហើយឱទ្ទានថា "ខ្ញុំមកអរគុណអ្នកដោយចង់ប្រាប់អ្នកថា ឥឡូវខ្ញុំបានរស់ហើយនៅទីនោះ ខ្ញុំមានសេរីភាពគ្រប់គ្រាន់ថ្ងៃនេះបានស្ងប់ក្នុងចិត្តណាស់ដែលបានមករំលឹកអតីតកាលដ៏កំសត់របស់ខ្ញុំជាមួយអ្នកជម្រះបញ្ចើអតីតកាលដ៏ជូរចត់ជាចុងក្រោយ..." ។



លោកគ្រូពេទ្យ ឆាន ទូច ខ្ចប់ដីអតីតជុំរំភៀសខ្លួនខាវអ៊ីដង



ប្រតិភូពីសហរដ្ឋអាមេរិកទៅដល់ទល់ដែនខ្មែរ-ថៃ



ឆាន ទូច : ខ្ញុំរកបាន៤០ដុល្លារហើយ

មិនមែនតែម្នាក់ឯងទេ មិត្តភ័ក្រ្តខ្មែរប្រមាណ១២-១៣នាក់ដែលទៅពីប្រទេសក្រៅដូចគ្នាជាអតីតសមាជិកនៃជុំរំពេលខ្លី ឬវែងដែរនោះ ក៏មានអារម្មណ៍ដូចគ្នា និងលោកគ្រូពេទ្យ ឆាន នេះដែរ ។ លោកបាននិយាយថា ចៅហ្វាយក្រុង រ៉ែតនីយ នឹងលោកស្រី រីតា មើសៀ សមាជិកក្រុមប្រឹក្សាក្រុងឡូវែលដែលចូលរួមដំណើរដែរ ឬនោះ មានអារម្មណ៍ថាបានស្គាល់ឫសគល់សហគមន៍ខ្មែរកាន់តែជ្រាលជ្រៅដោយសារតែបានមកដល់អតីតជុំរំភៀសខ្លួនខ្មែរនេះ។ រាជរដ្ឋបាលថៃខេត្តសាកែវជាមួយគ្នានោះ ជាអ្នកទទួលភ្ញៀវប្រមាន១៥០នាក់ទៀត អតីតៈអ្នកបំរើជុំរំភៀសខ្លួនខ្មែរគ្រប់ជំនាន់ពីអ.ស.ប. ក៏មកយ៉ាងអ៊ឹកធឹកក្នុងឱកាសខួប២៥ឆ្នាំនៃការបិតជុំរំនោះបានយ៉ាងសមរម្យណាស់ដែរ ។ លោកស្រី មូរ សុខហួរ អតីតរដ្ឋមន្ត្រីខ្មែរបានផ្តល់វត្តមាននៅទីនោះជាអតីតអ្នកជំនួយការមកពីស.រ.អា. នាពេលមានជុំរំភៀសខ្លួនខ្មែរនោះ។

ទាំងអស់គ្នាបានជួបសំណេះសំណាលគ្នារំលឹកពីទឹកភ្នែកនៃអតីតកាលនឹងសំណើចនៃបច្ចុប្បន្នកាលធ្វើឱ្យបរិយាកាសពោរពេញដោយការស្រឡាញ់នឹករលឹករកគ្នានៅឱកាសបែកគ្នាទៅវិញ ដែលនឹងមកដល់ នាថ្ងៃ១១មករាបន្តិចទៀតនេះ។

នៅពេលដែលភ្ញៀវខ្មែរនឹងក្រុមលោក រ៉ែតនីយ ចេញទៅទស្សនាក្រុងសៀមរាប-អង្គរវត្ត លោក ឆាន់ ទូច ត្រឡប់មកដល់ណងចាន់វិញ មិនភ្លេចធ្វើបុណ្យបាំងស្កូលឧទ្ទិសជូនបងស្រីដែលត្រូវគេបាញ់ស្លាប់នៅតាមផ្លូវពេលរត់តម្រង់មករកជ្រកកោននៅជុំរំភៀសខ្លួន ខាវអ៊ីដង សពក៏ស្វែងរកមិនដឹងជា កាលពី៣០ឆ្នាំមុនមានគេកប់នៅទីណានោះទេ "តើខ្មែរប៉ុន្មាននាក់ដែលបានរងគ្រោះដូចបងស្រីខ្ញុំ" លោក ឆាន ឱទ្ទាន។

លោកគ្រូពេទ្យ ឆាន ទូច បានបញ្ចប់ទស្សនកិច្ចនៅភ្នំពេញ ដោយនាំយកអង្ករ២តោនពីសប្បុរសជនខ្មែរនៅស.រ.អា.ទៅចែកជូនបងប្អូនខ្មែរនៅឈូកសង្កាត់ឬស្សីកែវជាមួយសោភ័ណ្ឌ ឡារី យុវសិល្បករចម្រៀង ជាមួយតំណាងរាស្ត្រជូនដល់អ្នកត្រូវគេរឹបអូសយកផ្ទះ យកដីធ្លីគ្មានចំណីអាហារនឹងគ្មានទីជម្រកដ៏ច្រើនដែលចំនួននេះចេះតែកើនឡើង គួរឱ្យព្រួយបារម្ភជាទីបំផុតដែលអង្ករ២តោននេះ គ្រាន់តែជាចំណីសម្រន់ពោះមួយភ្លែតតែប៉ុណ្ណោះ។

លោកគ្រូពេទ្យ ឆាន់ ទូច ត្រឡប់មកធ្វើការនៅពេទ្យ"មេត្តា" នាទីក្រុងឡូវែលវិញ នាំមកជាមួយនូវជម្ងឺផ្លូវចិត្តដែលមិនអាចរស់នៅយកសុខតែម្នាក់ឯងបានតទៅទៀត ក៏បន្តរ៉ៃអង្គាសទោះតិចទោះច្រើនផ្ញើរទៅជូនញាតិមិត្តកុំឱ្យដាច់ពោះស្លាប់នៅចុងក្រោយបង្អស់នោះ មានទាំងផ្ញើរ "សុកូឡា"តម្លៃ៤០ដុល្លាទៅឱ្យកុមារតូចម្នាក់ដែលបានផ្តាំថា "ពូ! មកលើកក្រោយ សូមផ្ញើរសូកូឡាឱ្យខ្ញុំបានហូបផង ឮថាឆ្ងាញ់ណាស់ តែខ្ញុំពុំដឹងថាជាអ្វីទេ!"៕

តមកពីទំព័រទី ០១ នៅជួរមុខនៃពាណិជ្ជករសម័យថ្មី

អធិបតីណាផ្សេងពីពាណិជ្ជករនឹងផលិតផលដែលគេយកមកបង្ហតគុណភាពខ្ពស់របស់គេតែម្យ៉ាងនោះទេ។ ភ្ញៀវប្រមាណជាង២រយនាក់បានសម្តែងការភ្ញាក់ផ្អើលជាលើកដំបូង រួមទាំងយុវជននឹងយុវនារីអាស៊ីខ្លួនឯងផង ដែលទើបនឹងបានឃើញវប្បធម៌ថ្មីកំពុងវិវត្តន៍យ៉ាងរលូននៅលើទឹកដីនៃសហរដ្ឋអាមេរិកនេះ មានខ្មែរ-ថៃ វៀតណាម ឥណ្ឌា កូរ៉េ ចិន ឡាវ ភូមា... ។ល។

នៅមានម្នាក់ទៀត ឈ្មោះ សុឃឿន ជាដែលគេទទួលស្គាល់ថា មានគុណសម្បត្តិខាងវោហាសម្លេងមានទឹកដម បានត្រូវអញ្ជើញពីទីក្រុងលីនឱ្យចូលរួមជាពិធីករដឹកនាំកម្មវិធីជូនជាសណ្តាប់នារាត្រីដ៏រីករាយនោះផងដែរ។

អ្នកទាំង៦រូបនេះ គឺប្រាកដជាអ្នកដើរជួរមុខនៃពាណិជ្ជកម្មអាស៊ីសម័យថ្មីដែលប្រឈមមុខនឹងការស្វែងរកភ្ញៀវសម្រាប់លក់ផលិតផលដែលមានទីផ្សារនៅតូចនៅឡើយ ពីទីជិតក៏ដូចជានៅទីឆ្ងាយឱ្យមកស្គាល់ហើយស្រឡាញ់ផលិត-ផលរបស់ខ្លួនតាមបច្ចេកទេស "ម៉ាកេទិង" គឺវិទ្យាសាស្ត្រទីផ្សារដែលខុសគ្នាស្រឡះពីពាណិជ្ជកម្មរបស់អ្នកជំនាន់មុន។

ចុងបញ្ចប់ តើនារីក្លាហានទាំងនោះ នឿយហត់ហើយឬនៅ? សូមអញ្ជើញស្តាប់យោបល់របស់ពួកគេ:

**SimSom,**" I am fortunate to be involved in the first Multicultural Wedding Expo in Lowell. It gave me an everlasting impression









to witness the beautiful diverse wedding cultures. It was an amazing art and history that was made. I am looking forward to next year. "

**Serina Van Danh,** "The Wedding Expo Lowell was a true representation of what an "All-American" city encompasses. As we continue to help strengthen the core and values to our town, we are also providing great opportunities for our children to adapt, learn and accept the many beautiful traditions that diversify our town"

**Dawn Simmons,**" I was intrigued and wanted to follow Champa in every way possible when she came to me with her amazing ideas of the Wedding Expo. Uniting our community, promoting our beautiful culture, and local businesses in a fashionable way. The day of the show as I watched all the hardwork coming to play, it was like walking in an enchanting dream of pure art.#makinghistory#"

**Linda Nom,**" It was exciting for me to be involved with such an event that involves the roots of our culture. And to be the first wedding expo held in Lowell was a great honor. We all came together and made it happen. "

**SokhoeunChea:** I am currently the owner of Apsara Restaurant in Lynn, MA. I took time off in between managing my restaurant to travel in the snow, into Lowell to support Champa Pang and her Avent Team. I was asked to MC and introduce the program for the evening's event. The event although was the first ever, was very organized with marketing strategies to promote the latest wedding trends including traditional and modern gowns, floral, cake, desserts, entrees, catering, champagne tower, party favors and offered many discounts from sponsors in the surrounding area. Many key players to the community came to support the event. I met our State Representative, Rady Mom who is an inspiration to me. I wantto thank Men's Wearhouse of Burlington on Middlesex Turnpike for the Tux they តទៅទំព័រទី១១

# ប្រតិភូខ្មែរកម្ពុជាក្រោមបានស្រាវជ្រាវរកឃើញឯកសារប្រវត្តិសាស្ត្រនៅបារាំងតាមផែនការ

**ដោយៈ យាង សុជាមេត្តា ២០១៥-០២-១៤ RFA**

ប្រតិភូសហគមន៍ខ្មែរកម្ពុជាក្រោម និងសម្ព័ន្ធយុវជនខ្មែរដើម្បីលទ្ធិប្រជាធិបតេយ្យដែលបានធ្វើដំណើរទៅស្រាវជ្រាវរកឯកសារប្រវត្តិសាស្ត្រទឹកដីកម្ពុជាក្រោមតាមការចង្អុលបង្ហាញរបស់ស្ថានទូតប្រទេសបារាំងប្រចាំកម្ពុជានោះ បានរកឃើញឯកសារសំខាន់ៗទាំងនោះហើយ ។

ប្រតិភូសហគមន៍ខ្មែរកម្ពុជាក្រោម និងសម្ព័ន្ធយុវជនខ្មែរដើម្បីលទ្ធិប្រជាធិបតេយ្យដែលបានដឹកនាំការស្រាវជ្រាវយកឯកសារនៅប្រទេសបារាំងទាក់ទងនឹងការកាត់ទឹកដីកម្ពុជាក្រោមទៅឱ្យវៀតណាមបានបញ្ចប់ហើយ ។

សេចក្ដីប្រកាសព័ត៌មានរបស់សហគមន៍ខ្មែរកម្ពុជាក្រោមចុះផ្សាយនៅថ្ងៃទី១២ ខែកុម្ភៈ ឱ្យដឹងថា ក្នុងដំណើរស្រាវជ្រាវរកឯកសារនៅប្រទេសបារាំងនោះ ជាលទ្ធផលបានស្រាវជ្រាវរកឃើញឯកសារ និងផែនទីសំខាន់ៗមួយចំនួនទៅតាមផែនការរបស់ខ្លួនដែលបានគ្រោងទុក ។ ក្នុងនោះមានដូចជាព្រះរាជសាររបស់សម្ដេចព្រះនរោត្តម សីហនុ ផ្ញើជូនរដ្ឋាភិបាលបារាំងកិច្ចព្រមព្រៀង និងសន្ធិសញ្ញាផ្សេងៗ រវាងបារាំង-វៀតណាម កំណត់ហេតុប្រជុំរដ្ឋសភា បារាំងក្នុងការកាត់ទឹកដីកម្ពុជាក្រោមឱ្យវៀតណាមនៅឆ្នាំ១៩៤៩ កំណត់ហេតុចរចា ព្រមទាំងលិខិតឆ្លើយឆ្លងសម្ងាត់ជាច្រើនទាក់ទងនឹងការកាត់ទឹកដីកម្ពុជាក្រោមឱ្យវៀតណាម ។



ប្រធានសហគមន៍ខ្មែរកម្ពុជាក្រោមលោក ថាច់ សេដ្ឋា (លើកដៃ) ដឹកនាំក្បួនបាតុកម្មទាមទារឱ្យស្ថានទូតវៀតណាមសុំទោសរឿងបំភ្លៃប្រវត្តិសាស្ត្រទឹកដីកម្ពុជាក្រោមនៅថ្ងៃទី៨ ខែតុលា ឆ្នាំ២០១៤ ។

ប្រធានសហគមន៍ខ្មែរកម្ពុជាក្រោមលោក ថាច់ សេដ្ឋា ដែលបានដឹកនាំគណៈប្រតិភូស្រាវជ្រាវនេះ ។ លោកមានប្រសាសន៍តាមទូរស័ព្ទពីប្រទេសបារាំង កាលពីថ្ងៃទី១៣ កុម្ភៈ ថា ឯកសារប្រវត្តិសាស្ត្រកម្ពុជាក្រោមដែលក្រុមលោកបានរកឃើញនៅប័ណ្ណសារដ្ឋានជាតិបារាំងក្នុងខេត្ត អេសង់ប្រូវ៉ង់ (Aix-En-Provence) ហើយដែលក្រុមលោកចង់ដឹងចង់ឃើញនោះ មានមិនតិចជាង៤ពាន់ទំព័រឡើយ ។




យ៉ាងណាក៏ដោយលោក ថាច់ សេដ្ឋា បញ្ជាក់ថា ឯកសារទាំងអស់នោះ កំពុងរក្សាទុកក្នុងប័ណ្ណសារដ្ឋានជាតិបារាំងនៅឡើយ រង់ចាំការប៉ាន់ប្រមាណតម្លៃ ដើម្បីថតចម្លង។ លោកថាតាមការឱ្យដឹងពីអ្នកទទួលខុសត្រូវបណ្ណាល័យការថតចម្លងក្នុង១ទំព័រ តម្លៃ ២.៥០អឺរ៉ូ ឬប្រមាណ ២.៨០ដុល្លារ សម្រាប់គុណភាពធម្មតា ប៉ុន្តែសម្រាប់គុណភាពល្អវិញ តម្លៃជិត១៧អឺរ៉ូ ឬប្រមាណ២០ដុល្លារឯណោះក្នុង១ទំព័រៈ "យើងរកឃើញហើយ ប៉ុន្តែនៅរង់ចាំគេថតចម្លងឱ្យយើង ហើយថតចម្លងនោះគឺថ្លៃណាស់ អញ្ចឹងយើងជួបបញ្ហាលំបាកណាស់ ហើយនៅក្នុងហ្នឹងពេលដែលយើងទៅស្រាវជ្រាវនោះ គឺគេមិនឱ្យយើងយកសូម្បីតែប៊ិចក៏ចូលមិនបានផង គេឱ្យខ្មៅដៃរបស់គេ ក្រដាសសរបស់គេ ហើយបើយើងថតវិញ គឺមិនច្បាស់ទៀត យើងចង់ឱ្យគេជួយថតចម្លងឱ្យយើងតែបើថតចម្លងវាថ្លៃ" ។

លោក ថាច់ សេដ្ឋា បញ្ជាក់ថា ខាងប័ណ្ណសារដ្ឋានជាតិបារាំង ត្រូវការពេលវេលាមួយសប្ដាហ៍ដើម្បីធ្វើការប៉ាន់ប្រមាណតម្លៃថតចម្លង ។ យ៉ាងណាក៏ដោយលោកថ្លែងហាក់ដោយអស់សង្ឃឹមថា បើការថតចម្លងនោះមានតម្លៃខ្ពស់ពេកប្រតិភូលោកប្រហែលជាគ្មានប្រាក់ដើម្បីទទួលយកនោះទេ ។ ប៉ុន្តែលោកថា ប្រសិនបើក្នុងដំណើរលើកទី១នេះ ក្រុមលោកមិនមានលទ្ធភាពយកឯកសារបានទាំងអស់នោះទេ លោកនឹងស្នើទៅរដ្ឋាភិបាលបារាំង ដើម្បីធ្វើដំណើរស្រាវជ្រាវនៅពេលក្រោយៗទៀត ។

ដំណើរស្វែងរកឯកសាររបស់សហគមន៍ខ្មែរកម្ពុជាក្រោម និងសម្ព័ន្ធយុវជនខ្មែរដើម្បីលទ្ធិប្រជាធិបតេយ្យនៅពេលនេះ គឺជាផ្នែកមួយនៃយុទ្ធនាការរបស់ខ្មែរក្រោមក្នុងការទាមទារឱ្យរដ្ឋាភិបាលវៀតណាមទទួលស្គាល់ប្រវត្តិសាស្ត្រទឹកដីកម្ពុជាក្រោមដែលមន្ត្រីការទូតវៀតណាមបាននិយាយបំភ្លៃកាលខែ មិថុនា ឆ្នាំ២០១៤ ។

លោក ថាច់ សេដ្ឋា ធ្លាប់បានបញ្ជាក់ថា យុទ្ធនាការទាមទារឱ្យរដ្ឋាភិបាលវៀតណាមទទួលស្គាល់ប្រវត្តិសាស្ត្រខ្មែរនឹងនៅធ្វើបន្តទៀត ។ យ៉ាងណាក៏ដោយលោកអះអាងថា លោកចង់បានឯកសារមកដល់ដៃជាមុនសិន ។ លើសពីនេះ លោក ថាច់ សេដ្ឋា មានជំនឿថា ឯកសារទាំងអស់នេះក៏នឹងជួយឱ្យកូនខ្មែរជំនាន់ក្រោយបានសិក្សារៀនសូត្រកាន់តែច្បាស់ថែមទៀតអំពីប្រវត្តិសាស្ត្រទឹកដីកម្ពុជាក្រោម ។

លោក ថាច់ សេដ្ឋា ក៏ឱ្យដឹងដែរថា លោកនឹងយកឯកសារទាំងនេះ ទៅតម្កល់នៅក្រសួងអប់រំ ឬរាជបណ្ឌិតសភាកម្ពុជា និងស្នើឱ្យរដ្ឋាភិបាលបញ្ចូលវាទៅក្នុងកម្មវិធីសិក្សាជាតិ ។

កំណត់ចំណាំចំពោះអ្នកបញ្ចូលមតិនៅក្នុងអត្ថបទនេះៈ ដើម្បីរក្សាសេចក្ដីថ្លៃថ្នូរយើងខ្ញុំនឹងផ្សាយតែមតិណាដែលមិនជេរប្រមាថដល់អ្នកដទៃប៉ុណ្ណោះ ៕

តមកពីទំព័រ ០៩ នៅជួរមុខនៃពាណិជ្ជករសម័យថ្មី

provided me. An impressive event with lasting impressions and rippling affects!

**Champa Pang,** "Initially the Wedding Expo Lowell was an event put together




just to show off what Avent Creators can provide in terms for décor, floral and favor trends. But as the planning and recruitment developed the event began to have a mind of it's own and whirlwind into one spectacular event. Not only did it showcase wedding trends, it also brought together a community of supporters, promoted surrounding businesses, invited different businesses into Lowell and exposed a lot of businesses outside of Lowell. It showcased many different cultures, but united them beautifully on stage. It promoted local aspiring models and brought a modeling agency front row seat! The Event became a milestone for Lowell and planning of future events to unfold. Many people scaffold and ask what is there to like about Lowell? Well, let's answer that question with more events like the Wedding Expo Lowell. Events that promote businesses, individual accomplishments and help the consumer find great products.

Avent Creators is eager to announce it's future events that will be unfolding and will be looking for more support to put us on the map! April: Floral Show, May: Khmer Post Gala, June: Sports Convention, August: Miss Cambodian-American Pageant. Anyone interested in volunteering or sponsoring any of these events please contact Champa Pang, Owner of Avent Creators 978-337-8644, as soon as possible!

នាង ចម្ប៉ា ប៉ាង មានបំណងយ៉ាងមាំថា នឹងបន្តរបង្កើតព្រឹត្តិការណ៍វប្បធម៌ថ្មីៗទៀត ដែលនឹងត្រូវការអ្នកជួយគាំទ្រ នៅថ្ងៃខាងមុខ ដើម្បីហើយគ្រោងនឹងធ្វើ ១-ពិធីបង្ហាញពីផ្កា នាខែមេសា ២-ចូលរួមរាត្រីសមោសរខ្មែរផុស ស.រ.អា. នៅខែឧសភា ៣-ធ្វើសន្និបាទនៃកីឡា នៅខែមិថុនា ៤-ប្រឡងបវរកញ្ញា នាខែសីហា. បើមានអ្នកណាស្ម័គ្រចិត្ត ឬគាំទ្រព្រឹត្តិកាណ៍ណាមួយ សូមសួររកអ្នកបង្កើតព្រឹត្តិការណ៍ឱ្យបានឆាប់មក ចម្ប៉ា ប៉ាង ទូរស័ព្ទ ៩៧៨-៣៣៧ ៨៦៤៤ ។

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

## លោក នួន ជា ទម្លាយភាពស្ងប់ស្ងាត់សួរដេញដោលអ្នកកាសែតជើងចាស់

**ដោយ ហ៊ូលលី រ៉ូបិនស៊ិន** | **February 12, 2015**

៤០ឆ្នាំបន្ទាប់ពីលោកស្រី អេលីហ្សាបេត ប៊ិកឃឺ បានចូលជួបមេដឹកនាំខ្មែរក្រហមសម្លាប់រង្គាល ប៉ុល ពត ក្នុងរបបកម្ពុជាប្រជាធិបតេយ្យដ៏សម្ងាត់នោះ អ្នកកាសែតអាមេរិករូបនេះ កាលពីថ្ងៃពុធបានប្រឈមនឹងសំណួរជាច្រើនពីមេដឹកនាំទីពីរ។

លោក នួន ជា ឬ "បងធំទី២" ដែលកំពុងត្រូវជំនុំជម្រះនៅសាលាក្តីខ្មែរក្រហមពីបទឧក្រិដ្ឋកម្មប្រឆាំងមនុស្សជាតិ និងប្រល័យពូជសាសន៍រួមជាមួយមេដឹកនាំ ខៀវ សំផន ក្នុងរបបតែមួយបានសួរពីរសំណួរទៅលោកស្រី ប៊ិកឃឺ នៅពេលចាប់ផ្តើមនៃថ្ងៃទីពារបស់លោកស្រីក្នុងនាមជាសាក្សីជំនាញនៅសាលាក្តីនេះ។

ដំបូងគាត់បានសួរអតីតអ្នកឆ្លើយឆ្លងព័ត៌មានកាសែតវ៉ាស៊ីនតោនរូបនេះឱ្យពន្យល់ហេតុអ្វីបានជារដ្ឋាភិបាលអាមេរិកទម្លាក់គ្រាប់បែកប្រហែលបីលានតោនលើប្រទេសកម្ពុជានៅដើមទសវត្សរ៍ឆ្នាំ១៩៧០ ហើយដែលសម្លាប់ប្រជាជនកម្ពុជាស្លូតត្រង់ និងកម្ទេចភូមិករ ស្រែចម្ការនិងវត្តអារាមអស់ជាច្រើន។

លោកស្រី ប៊ិកឃឺ បាននិយាយថា មូលហេតុរបស់រដ្ឋាភិបាលអាមេរិកគឺគាំទ្ររបប លន់ នល់។ ទាក់ទិននឹងយុទ្ធនាការទម្លាក់គ្រាប់បែកយ៉ាងខ្លាំងក្នុងឆ្នាំ១៩៧៣ លោកស្រីបានបន្ថែមថា "នោះដោយសារការព្រួយបារម្ភនៅពេលនោះ ជាការព្រួយបារម្ភថារបបសាធារណរដ្ឋខ្មែរនឹងចាញ់ ហើយមូលហេតុទី២ រដ្ឋបាលលោក និកសុន នៅពេលនោះសង្ឃឹមថា ការទម្លាក់គ្រាប់បែកនេះអាចបង្ខំឱ្យពួកខ្មែរក្រហមចូលតុចរចា"។

ចំពោះសំណួរទី២ ថាតើរដ្ឋាភិបាលអាមេរិកទទួលខុសត្រូវចំពោះសោកនាដកម្មពីការទម្លាក់គ្រាប់បែកលើប្រជាជនកម្ពុជា ឬយ៉ាងណា លោកស្រី ប៊ិកឃឺ បានឆ្លើយថា "ពិតមែនហើយ"។

បន្ទាប់ពីដល់ម៉ោងសម្រាកនៅព្រឹកនោះ លោក នួន ជា បានមើលដំណើរការនីតិវិធីតាមរយៈវីឌីអូពីបន្ទប់ឃុំខ្លួនដោយសារសុខភាពមិនល្អ។ **តទៅទំព័រទី១៣**

## Nuon Chea Breaks Silence to Question Journalist

**KUCH NAREN | JANUARY 29, 2015**

By Holly Robertson | February 12, 2015

F T G+ L E



Forty years after Elizabeth Becker was granted an audience with murderous Khmer Rouge leader Pol Pot during the secretive Democratic Kampuchea regime, the American journalist on Wednesday faced questions from his second-in-command.

Nuon Chea, or "Brother Number Two," who is being tried at the Khmer Rouge tribunal for crimes against humanity and genocide along with fellow regime leader Khieu Samphan, put two questions to Ms. Becker at the start of her third day as an expert witness at the trial.

Elizabeth Becker addresses the Khmer Rouge tribunal yesterday. (ECCC)

He first asked the former Washington Post correspondent to explain why the U.S. government dropped about 3 million tons of bombs on Cambodia during the early 1970s, killing many innocent people and destroying homes, rice fields and pagodas.

Ms. Becker said the U.S. government's reason was its support for Lon Nol's administration. Of the intense bombing campaign in 1973, she added: "That was the result of the fear at that stage of, one, that the Khmer Republic would lose, and two, the belief by then the administration of Richard Nixon that by bombing, the Khmer Rouge would come to the negotiation table."

Asked, secondly, whether she was of the opinion that the U.S. government was solely responsible for the tragedy its bombings inflicted on Cambodian people, Ms. Becker replied: "Of course."

Following the break in the morning session, Nuon Chea retired to watch the proceedings via video link from a holding cell on account of his poor health.

International lead co-lawyer for the civil parties, Marie Guiraud, then noted that Nuon Chea had "chosen" to be absent during previous hearings when civil parties were speaking about the crimes they witnessed during the Khmer Rouge era but sat through an entire session of Ms. Becker's evidence.

"[H]e had promised us at the beginning of **Continued to Page 15**

## ច្បាប់ស្តីពីព័ត៌មានសម្ងាត់របស់រដ្ឋ នឹងត្រូវបញ្ជូនទៅទីស្តីការគណៈរដ្ឋមន្ត្រីពិនិត្យក្នុងពេលឆាប់ៗ

**ដោយៈ គ្រិស ម៉ូល្ល័រ** | **FEBRUARY 13, 2015**

មន្ត្រីនគរបាលជាន់ខ្ពស់មួយរូបបានលើកឡើងកាលពីម្សិលមិញថា ការធ្វើសេចក្តីព្រាងច្បាប់មួយដើម្បីការពារព័ត៌មានសម្ងាត់របស់រដ្ឋបានដំណើរការរយៈពេលជាងពីរឆ្នាំមកហើយ ហើយអាចនឹងដាក់ជូនទៅឱ្យទីស្តីការគណៈរដ្ឋមន្ត្រីពិនិត្យក្នុងរយៈពេលពីរខែទៀត។

សេចក្តីព្រាងច្បាប់នេះត្រូវបានគេដឹងឮជាលើកដំបូងនៅថ្ងៃទី២៨ ខែមករា នៅពេលនគរបាលជាតិបានប្រកាសនៅលើគេហទំព័ររបស់ខ្លួនថា ក្រសួងមហាផ្ទៃកំពុងស្ថិតក្នុងដំណើរការព្រាងច្បាប់នេះ។ ព័ត៌មានបង្ហោះលើគេហទំព័រនេះបានបញ្ជាក់ថា ច្បាប់នេះមានបំណងការពារ "ព័ត៌មានសម្ងាត់របស់រដ្ឋដើម្បីធានាថា ភាពសម្ងាត់របស់ជាតិត្រូវបានការពារយ៉ាងតឹងរ៉ឹង"។

ឧត្តមសេនីយ៍ឯក គៀត ច័ន្ទថារិទ្ធ អ្នកនាំពាក្យនគរបាលជាតិបានមានប្រសាសន៍កាលពីម្សិលមិញថា ក្រសួងបានដំណើរការព្រាងច្បាប់នេះ ជាងពីរឆ្នាំមកហើយ។លោកបានមានប្រសាសន៍ទៀតថា "ខ្ញុំសង្ឃឹមថា មួយខែពីរខែទៀត សេចក្តីព្រាងច្បាប់នេះនឹងត្រូវអនុម័តដោយក្រសួងរួចបញ្ជូនទៅទីស្តីការគណៈរដ្ឋមន្ត្រី"។

លោកបានលើកឡើងទៀតថា ច្បាប់នេះត្រូវបានតាក់តែងឡើងដើម្បីការពារ "ព័ត៌មានសម្ងាត់" របស់រដ្ឋាភិបាល។ **តទៅទំព័រទី ១៥**

## State-Secrets Law to Be Sent To Council of Ministers Soon

**BY CHRIS MUELLER | FEBRUARY 13, 2015**

A draft law to protect state secrets has been in the works for more than two years and could be submitted to the Council of Minister for review in two months' time, a senior police official said yesterday.

The existence of the draft law first came to light on January 28 when the National Police announced on its website that the Interior Ministry was in the process of drawing it up. A post on the website said the law would aim to protect "state secrets in order to ensure national secrecy is strictly protected."

National Police spokesman Kirth Chantharith said yesterday that the ministry had been working on the draft law for more than two years.

"I hope after one or two more months this draft will be passed by the ministry and sent to the Council of Ministers," Lieutenant General Chantharith said.

He said the law was designed to protect the government's "secret information."

"It is related to information that is not publicly disseminated," Lt. Gen. Chantharith added. "For example, the secret information related to security, defense, economy, environment."

The spokesman explained that the law, in its current state, included provisions that would allow the government to **Continued to Page 19**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការបោះពុម្ពផ្សាយពី ឌឹ ខេមបូឌា ដេលី

# សៀវភៅថ្មីបង្ហាញរូបថតដំបូងៗនៃប្រាសាទអង្គរ

នៅពេលដែលការនិពន្ធរបស់លោក ហិនរី មូហាត់ ស្តីពីអង្គរបានចេញផ្សាយនៅក្នុងឆ្នាំ១៨៦៣ និងឆ្នាំ១៨៦៤ ដែលធ្វើឱ្យទ្វីបអឺរ៉ុបមានការចាប់អារម្មណ៍ដល់ប្រទេសកម្ពុជាជារហូតនោះ អ្នកថតរូបជនជាតិស្កុតឈ្មោះ ចន ថមសុន កើតមានគំនិតថតរូបប្រាសាទដែលគូសព្រាងដោយអ្នកធម្មជាតិនិយមនិងជាអ្នកស្រាវជ្រាវជនជាតិបារាំង។

ការនិយាយស្រួលជាងការធ្វើកាលពី១៥០ឆ្នាំមុន គឺមិនមែនមានន័យថា ត្រឹមតែត្រូវរៀបចំធ្វើដំណើរទៅកាន់ទីតាំងជ្រៅក្នុងព្រៃស្បាតប៉ុណ្ណោះទេ តែថែមទាំងត្រូវដឹកជញ្ជូនឧបករណ៍ថតរូបសម័យនោះ ដែលត្រូវការអ្នកដឹកជញ្ជូនដល់ទៅ១០នាក់ទៀតផង។

ការធ្វើដំណើរកាលពីឆ្នាំ១៨៦៦នោះ លោក ថមសុន បានចំណាយពេលបីខែដែលនៅពេលនោះលោកស្ទើរតែស្លាប់ដោយសារជំងឺគ្រុនចាញ់ទៅហើយ។ ប៉ុន្តែនៅឆ្នាំបន្ទាប់មកមានការបោះពុម្ពផ្សាយសៀវភៅរបស់លោកមានចំណងជើងថា "វត្ថុបុរាណកម្ពុជា" ដែលបង្ហាញឱ្យឃើញរូបថតប្រាសាទអង្គរចំនួន១៦សន្លឹកដំបូងដែលមិនធ្លាប់មានពីមុនមក។

ទោះជាយ៉ាងនេះក្តីដោយសារដំណើរការត្រូវចំណាយលុយកាក់ច្រើននិងរយៈពេលយូរទាក់ទិននឹងការបោះផ្សាយរូបថតក្នុងសៀវភៅមួយក្បាលនៅពេលនោះ អត្ថបទត្រូវបានបោះពុម្ពមុន ហើយរូបថតដាក់ចូលម្តងមួយៗលើចន្លោះទំព័រទំនេរនោះ សៀវភៅរបស់លោក ថមសុន មួយចំនួនតូចប៉ុណ្ណោះបានចេញផ្សាយកាលពីឆ្នាំ១៨៦៧ ហើយមិនដែលត្រូវបានបោះពុម្ពជាថ្មីទេតាំងពីពេលនោះមក។

មូលហេតុនេះហើយដែលលោក ចូល ម៉ុន ថេក ជនជាតិអាមេរិកជាអ្នកសន្សំកាតប៉ុស្តាល់នៃប្រទេសកម្ពុជានិងឥណ្ឌូចិនដំបូងគេ ហើយ និងលោក ជីម មីហ្សិស្តី ជាអ្នកថតរូបអាមេរិកម្នាក់មានមូលដ្ឋាននៅប្រទេសកម្ពុជាបានសម្រេចចិត្តយករូបថតទាំងនោះមកបង្ហាញឡើងវិញក្រោយពីរយៈពេលជិត១៥០ឆ្នាំកន្លងផុតទៅ។



ចេញផ្សាយនៅប្រទេសកម្ពុជាកាលពីចុងឆ្នាំមុន សៀវភៅមានទ្រង់ទ្រាយធំកម្រាស់២២៥ទំព័រ មានចំណងជើងថា "ចន ថមសុន ប៉ុន្មានឆ្នាំដំបូង-ការស្រាវជ្រាវនៅអាស៊ី" មិនត្រឹមតែបញ្ចូលខ្លឹមសារសៀវភៅ និងរូបថតអង្គររបស់លោក ថមសុន ប៉ុណ្ណោះទេ ប៉ុន្តែថែមទាំងរៀបរាប់រឿងរ៉ាវរបស់បុរសម្នាក់ ដូចដែលលោក មីហ្សិស្តី បង្ហាញដូច្នេះដែរ គឺជាអ្នកកាសែតថតរូបម្នាក់ក្នុងចំណោមអ្នកកាសែតថតរូបដំបូងៗគេ។

សៀវភៅមួយចំនួនត្រូវបានសរសេរកាលពីពេលមុនទាក់ទិននឹងលោក ថមសុន ច្រើនតែដោយសាររូបថតរបស់គាត់អំពីប្រទេសចិននិងជីវិតតាម

តទៅទំព័រទី១៤

# First photographer

BY MICHEL VAN PAY | FEBRUARY 12, 2015

*New book reveals first photos of Angkor*

When the author of Henry Moon tired of Angkor was released in 1863 and 1864, making it Europe of interest to the country until Scottish photographer John Thompson photographed castle draft drawn Nature and French researchers.

Said than done 150 years ago, does not mean that just need to be prepared to travel to the location deep the impenetrable jungle but also transportation camera session transport up to 10 people .

A trip in 1866, Thompson spent three months at the time he almost died of malaria. But then published his book titled "artifacts" that showed photos of the Temple The first sheet 16 Angkor ever before.

However, because the process takes a lot of money and long-term deals with publishing the photos in a book At the time the article was published before photo and placed one by one on the space available, the book's pages, Tom Johnson, a small number was released in 1867 and was never published again since then.

That's why he joined Richmond American Taylor savings postcards of the country and the first Indochina, and mainly as a photographer American, based in the country have decided to take a photo and then reappear after a period of nearly 150 years ago passed.

Released in the country last year, large-scale book thickness of 225 pages titled "John Thompson, the first few years - research Asia ", meaning not only his books and photos of Angkor Tom Johnson, but also tells the story of a man as he mainly shows Photography is a journalist one of the first newspaper photographer.

Some books have been written earlier related to Tom Johnson because of his photographs of China and the streets of London He was shot at during the 1870's. But most of these publications have focused on his work and almost never talked about himself.

He mainly said, "of course, very little is known about the man, Tom, who I want to know who he was, what drove him to do it. "

Richmond lenses and mainly expected that the project will take a year to two years. But research on the life of the battery, and the collection of photographs of his trip to Angkor and other projects completed by Using four years.

During that time they contact your photo collections and private libraries in almost every continent.

Mr. Harmon Taylor explained that their first hope is to re-produce his work, Tom Johnson from an existing file, but found little originality fragile lining until no one is willing to risk the camera scans the page.

He said, "the library said Lowell bite (Wellcome Library) in London photo photo shadow Pacific photo glass plates ". This enabled them to re-print works in its books.

What emerges from their research is a friendly man whose livelihood from what At that time a new profession.

Born in a middle class family in the city of Edison Steinberg, Tom Johnson received training and specialize glasses or Repair other scientific instruments. By 1862, when he joined brother, a photographer named **Continued to Page 18**

## តមកពីទំព័រទី ១២ លោក នួន ជា ទម្លាយរឿងស្ងប់ស្ងាត់....

សហមេធាវីអន្តរជាតិខាងដើមបណ្តឹងរដ្ឋប្បវេណី លោក ម៉ារី ហ្គីរូដ ពេលនោះបានកត់សម្គាល់ថា លោក នួន ជា បាន "ជ្រើសរើស" មិនចូលរួមក្នុងសវនាការលើកមុនពេលដែលដើមបណ្តឹងរដ្ឋប្បវេណីនិយាយអំពីឧក្រិដ្ឋកម្ម ដែលពួកគេបានឃើញផ្ទាល់ភ្នែកក្នុងសម័យខ្មែរក្រហម ប៉ុន្តែលើកនេះបានអង្គុយរហូតទាល់ចប់ការផ្តល់សក្ខីកម្មរបស់លោកស្រី ប៊ិកឃី។

លោកស្រីបាននិយាយថា "ឱ្យគាត់ឧបានសន្យានឹងយើងនៅពេលចាប់ផ្តើមការជំនុំជម្រះថា គាត់នឹងចូលរួមក្នុងសវនាការ ហើយបានប្រកែកជារហូតមិនឆ្លើយសំណួរដែលចោទសួរចំពោះគាត់ដោយដើមបណ្តឹងរដ្ឋប្បវេណីទេ"។

"ហើយយើងកត់សម្គាល់នៅថ្ងៃនេះថា គាត់លែងប្រើសិទ្ធិនៅស្ងៀមស្ងាត់ទៀតហើយ ដោយចោទសួរលោកស្រីប៊ិកឃី ដែលជា "មនុស្សសំខាន់"។

នៅពេលរសៀលអ្នកនិពន្ធសៀវភៅមានចំណងជើងថា "ពេលសង្គ្រាមផុតរលត់ទៅ" រូបនេះត្រូវលោកស្រី អានតា ហ្គិស សហមេធាវីអន្តរជាតិខាងលោក ខៀវ សំផន សួរ ថាតើលោកស្រីចាត់ទុកសៀវភៅរបស់លោកស្រីជាស្នាដៃអ្នកកាសែតឬអ្នកសិក្សាស្រាវជ្រាវ។

លោកស្រី ហ្គិស បានអានសេចក្តីដកស្រង់ពីអត្ថបទឆ្នាំ១៩៨៦របស់អ្នកប្រវត្តិសាស្ត្រដ៏ល្បីលោក ដេវិដ ឆាណ្ឌល័រ (David Chandler) ដែលរិះគន់វិធីសាស្ត្ររបស់លោកស្រីដែលលោកបាននិយាយថា បានត្រួតពិនិត្យគ្រប់គ្រាន់ដោយសារតែលោកស្រីមិនចេះខ្មែរដែលលោកបាននិយាយថា ជាហេតុធ្វើឱ្យលោកស្រីមានកំហុស ហើយលោកស្រីក៏មិនបានយោងប្រភពនានាឱ្យបានត្រឹមត្រូវទេ។

លោកស្រីបាននិយាយថា លោកស្រីដឹងថាលោក ឆាណ្ឌល័រ បានសរសេរទៅកាន់អ្នកសិក្សាស្រាវជ្រាវដោយស្នើសុំពួកគេកុំឱ្យប្រើសៀវភៅរបស់លោកស្រីជាសៀវភៅសិក្សា ប៉ុន្តែបានសំដែងការភ្ញាក់ផ្អើលចំពោះការរិះគន់លើអត្ថបទ។

លោកស្រីបាននិយាយថា "អ្នកកាសែតគ្រប់រូបដែលសរសេរសៀវភៅមួយក្បាលលោកអ្នកនឹងឃើញអត្ថបទដ៏ល្អរបស់លោក ដេវិដ ឆាណ្ឌល័រ ដែលនិយាយថា "នេះពិតជាអស្ចារ្យមែន"។ ដូច្នេះគាត់បានប្រើឱ្យការរិះគន់នេះ "ទៅលើអ្នកកាសែតម្នាក់ដែលខ្ញុំអាចដឹង។ នោះគឺខ្ញុំហ្នឹងឯង។ ហើយខ្ញុំនឹងសម្គាល់ថា ខ្ញុំជាអ្នកកាសែតស្រីតែម្នាក់គត់ដែលបានសរសេរសៀវភៅបែបនេះ"។ សវនាការនៅសាលាក្តីបន្តនៅថ្ងៃនេះទៀត៕ **មានិត**

ទស្សនអ្នកអាន

# លោក អាដាម ព្រិល ខកចិត្ត

## Adam Pril expresses his disactisfaction to the city meeting

នាយករងសមាគមសេដ្ឋកិច្ចអាស៊ីនៅឡូវែល អាដាម ព្រិល បានទូរស័ព្ទមកការិយាល័យខ្មែរផុសស.រ.អា. សម្តែងមតិយ៉ាងដូច្នេះថា :

"ខ្ញុំបានចូលរួមប្រជុំមួយនៅសាលាក្រុងឡូវែល កាលពីថ្ងៃសុក្រ ទី៦កុម្ភៈ ឆ្នាំ២០១៥ តាមសេចក្តីអញ្ជើញរបស់លោកអភិបាលក្រុងរ៉ែតនីយ ដើម្បីបង្កើតគណកម្មការមួយរៀបចំសង់រូបចម្លាក់មួយតាំងនៅកណ្តាល"ក្រុងខ្មែរ"។ ខ្ញុំមានការខកចិត្តដោយឃើញគំនិតដ៏ល្អនេះបានដើរទៅមុខយ៉ាងលឿនដោយគ្មានសួរយោបល់អ្នករស់នៅទីក្រុងខ្មែរនោះម្តងណាសោះ ស្រាប់តែគេឱ្យដឹងថា មានគំរូរួចទៅហើយ គេបានដឹងថាដាក់នៅកន្លែងណា ហើយថវិការសម្រាប់កសាងរូបចម្លាក់នោះ នឹងបានមកពីរដ្ឋាភិបាលខ្មែរ ! បើគេនៅតែធ្វើតែរបៀបនេះ ខ្ញុំនឹងលាចេញពីគណកម្មការនោះភ្លាម !


លោក អាដាម ព្រិល



១-សួរថាតើប្រជុំថ្ងៃនេះជាប្រជុំបើកចំហរជាសាធារណៈ ឬក៏ប្រជុំបិទទ្វារ ? មានភាពជាតំណាងពលរដ្ឋខ្មែរនៅឡូវែលគ្រប់គ្រាន់ឬទេ?

២-តើគួរសួរប្រជាពលរដ្ឋម្ចាស់ក្រុងខ្មែរ និងខ្មែរសង្កាត់១៨ ដែរឬទេ ថាតើគេចង់បានរូបចម្លាក់អ្វី? របៀបណា? ដាក់នៅកន្លែងណា?

៣-ខ្មែរទីនេះ ភាគច្រើនជាជនភៀសខ្លួន មិនចង់ឃើញលុយពីរដ្ឋាភិបាលភ្នំពេញមកសង់អ្វីនៅឡូវែលនេះទេ តើយើងអាចមានលទ្ធភាពធ្វើខ្លួនឯងបានឬទេ? អស់ថ្លៃប៉ុន្មាន?

ខ្ញុំយល់ថា បើមិនខ្វល់ពីយោបល់សាធារណជនទេ នេះជាបំណងនយោបាយមិនត្រូវឱ្យពលរដ្ឋឡូវែលបែកបាក់គ្នាបន្ថែមនៅពេលទៅឃើញរូបចម្លាក់នោះម្តងៗទៀតទេ !

ខ្ញុំសង្ឃឹមដែរថា លោករ៉ែតនីយ នឹងលើករឿងនេះឡើងវិញ នៅកិច្ចប្រជុំថ្ងៃទី១០មិនាខាងមុខដូចសន្យា ៕

---

តមកពីទំព័រទី ១៣

## សៀវភៅថ្មីបង្ហាញរូបថតដំបូងៗនៃ...

ផ្លូវក្រុងឡុងដែលគាត់បានថតនៅអំឡុងទសវត្សរ៍ឆ្នាំ១៨៧០។ ប៉ុន្តែការបោះពុម្ពផ្សាយទាំងនោះភាគច្រើនបានផ្តោតលើស្នាដៃរបស់គាត់និងស្ទើរតែមិននិយាយអំពីខ្លួនគាត់ទេ។

លោក មីហ្សីស្តី បាននិយាយថា "ពិតណាស់មានគេស្គាល់តិចតួចប៉ុណ្ណោះអំពីបុរស ថមសុន ដែលខ្ញុំចង់ដឹងថា គាត់ជានរណាមានអ្វីដែលជំរុញរូបគាត់ឱ្យធ្វើកិច្ចការនោះ"។

លោក ម៉ុនថេក និងលោក មីហ្សីស្តី រំពឹងថាគម្រោងនេះនឹងប្រើពេលមួយឆ្នាំទៅពីរឆ្នាំ។ ប៉ុន្តែការស្រាវ ាវអំពីជីវិតរបស់ ថមសុន និងការប្រមូលរូប ត នៃការធ្វើដំណើររបស់គាត់ទៅអង្គរ និងកន្លែងផ្សេងទៀត គម្រោងនេះបានបញ្ចប់ដោយប្រើពេលបួនឆ្នាំឯណោះ។

នៅអំឡុងពេលនោះ ពួកគេបានទាក់ទងអ្នកប្រមូលរូបថតនិងបណ្ណាល័យឯកជននៅស្ទើរគ្រប់ទ្វីប។

លោក ម៉ុនថេក បានពន្យល់ថា សេចក្តីសង្ឃឹមដំបូងរបស់ពួកគាត់គឺត្រូវផលិតឡើងវិញនូវស្នាដៃរបស់លោក ថមសុន ពីឯកសារសៀវភៅដែលមានស្រាប់ ប៉ុន្តែការរកឃើញប្រភពដើមតិចតួចនោះផុយរបេះ រហូតដល់គ្មាននរណាហ៊ានប្រថុយថតស្កេនទំព័រទាំងនោះ។

លោកបាននិយាយថា "មានការឱ្យដឹងថា បណ្ណាល័យ វ៉ែលខាម (Wellcome Library) នៅក្រុងឡុងមានរូបថតដើមតែជារូបថតស្រមោលដើមដែលជាហ្វីលរូបថតប្រភេទ glass plates"។ ប្រភេទនេះអាចឱ្យពួកគេបោះពុម្ពស្នាដៃជាថ្មីក្នុងសៀវភៅរបស់ខ្លួន។

អ្វីដែលកើតចេញពីការស្រាវជ្រាវរបស់ពួកគាត់ គឺរូបភាពមួយរបស់បុរសដ៏រួសរាយរាក់ទាក់ម្នាក់ដែលប្រកបរបរចិញ្ចឹមជីវិតពីអ្វីដែលនៅសម័យនោះជាវិជ្ជាជីវៈថ្មីបំផុត។

កើតក្នុងគ្រួសារវណ្ណៈកណ្តាលនៅទីក្រុងអេឌីនប៊ឺក លោក ថមសុន ទទួលបានការហាត់រៀនជាអ្នកធ្វើវ៉ែនតា និងមានជំនាញខាងធ្វើ ឬជួសជុលនាឡិកានិងឧបករណ៍វិទ្យាសាស្ត្រផ្សេងទៀត។ មកដល់ឆ្នាំ១៨៦២ ពេលដែលគាត់ចូលរួមជាមួយបងប្រុសដែលជាអ្នកថតរូបឈ្មោះ វីល្លៀម ថមសុន នៅប្រទេសសិង្ហបុរី ដោយធ្វើដំណើរតាមទូកជាមួយគូដណ្តឹងរបស់បងប្រុសរបស់គាត់រយៈពេលមួយខែនោះ គាត់បានចាប់ផ្តើមក្លាយខ្លួនជាអ្នកថតរូបតែម្តង។

មកដល់ទ្វីបអាស៊ីថ្មីៗ លោក ថមស៊ុន បានចាប់ផ្តើមថតរូបភ្លាមរហូតដល់បានដាក់លក់នៅក្នុងទីក្រុងកំពង់ផែដ៏ជឿនលឿននេះ។ មុខរបរនេះបានធ្វើឱ្យគាត់ធ្វើដំណើរមកដល់តំបន់តាំងលំនៅច្រកសមុទ្រ (Straits Settlements) ជាទឹកដីអាណានិគមអង់គ្លេសដែលសព្វថ្ងៃមួយផ្នែកធំជាប្រទេសម៉ាឡេស៊ី ពោលគឺជាបទពិសោធន៍មួយដែលក្រោយមកលោកបានចងក្រងធ្វើសៀវភៅមួយមានចំណងជើងថា "ច្រកសមុទ្រ ម៉ាឡាកា" ដែលនៅក្នុងសៀវភៅនោះ គាត់បានរៀបរាប់អំពីម៉ាឡាយ៉ា ថាជា "កន្លែងមួយដែលថា ការលំហែកាយហាក់ដូចជាស្ថិតនៅមាត់ទ្វាររបស់មនុស្សគ្រប់គ្នាដែលមានអារម្មណ៍ចង់សម្រាក ព្រោះជាសមុទ្រស្ងប់ស្ងាត់ ហើយក៏មានដើមត្នោតដ៏ធំស្គឹមស្គៃដែលមានស្លឹកធំៗរបស់វាយោកពីលើផ្ទះល្អប្រណីតដែលទទួលរងប៉ះពាល់ពីកត្តាធាតុអាកាស។

ប៉ុន្តែការបោះពុម្ពផ្សាយស្នាដៃរបស់លោក មូហាត់ ក្នុងឆ្នាំ១៨៦៣និង១៨៦៤នៅទ្វីបអឺរ៉ុបបានផ្តល់ឱ្យលោក ថមសុន នូវគោលបំណងថ្មីមួយនោះ គឺទៅសៀម ដែលក្រោយមកហៅថា ប្រទេសថៃ ហើយចេញពីទីនោះបានបន្តដំណើរទៅប្រាសាទអង្គរ។ នៅពេលលោកសរសេរក្នុងសៀវភៅរបស់លោកស្តីពីអង្គរ "ការរៀបរាប់មាននៅក្នុងស្នាដៃរបស់លោក មូហាត់ អំពីភាពរុងរឿងនៃទីក្រុងនានាដែលរងការបែកបាក់ដែលអ្នកនិពន្ធបានរកឃើញនៅកណ្តាលព្រៃនៅប្រទេសកម្ពុជា បានអន្ទងរូបខ្ញុំមិនត្រឹមតែធ្វើឱ្យខ្ញុំតាំងចិត្តធ្វើទស្សនកិច្ចប្រទេសសៀមប៉ុណ្ណោះទេ តែថែមទាំងធ្វើដំណើរឆ្លងប្រទេសនេះ និងចូលខាងក្នុងប្រទេសកម្ពុជាក្នុងគោលបំណងរុករក និងថតទីក្រុងបាក់បែងរបស់ប្រទេសកម្ពុជាទៀតផង"។

បើទោះជាប្រើបច្ចេកវិជ្ជាថតរូបទំនើបបំផុតនៅសម័យនោះក៏ដោយ ក៏កិច្ចការនេះធំអនេកជាងការគ្រាន់តែវេចខ្ចប់ម៉ាស៊ីនថតមួយទៅទៀត។

លោក មីហ្សីស្តី បានពន្យល់អំពីដំណើរការហ្វីល (wet-plate) ដែលប្រើដោយអ្នកថតរូបនៅទសវត្សរ៍ឆ្នាំ១៨៦០ថា "អ្នកថតរូបនឹងធ្វើល្បាយខាប់ម្យ៉ាង បន្ទាប់មកចាក់វាលើហ្វីល glass plate រលាក់ចុះរលាក់ឡើងធ្វើឱ្យវាស្រោបសព្វហ្វីល បន្ទាប់មកទៀតបង្ហូរវាចេញកុំឱ្យមានស្នាមជ្រួញ ឬអ្វីមួយលើវា។ បន្ទាប់មកពួកគេប្រើសារធាតុគីមីដើម្បីធ្វើឱ្យហ្វីលមានភាពរស់ពេលត្រូវពន្លឺ ហើយត្រូវថតភ្លាម និងផ្តិតវាភ្លាមក្នុងពេលដែលវានៅសើមនៅឡើយ"។

ប្រសិនបើអ្នកស្ថិតនៅកណ្តាលព្រៃក្នុងប្រទេសកម្ពុជា នោះមានន័យថា អ្នកត្រូវតែមានតង់មួយជាបន្ទប់ងងឹតជាមួយនឹងដបសារធាតុគីមីដើម្បីធ្វើកិច្ចការនេះ ពោលគឺសារធាតុគីមីដែលអាចពុលនិងធ្វើឱ្យរលាកភ្នែករបស់អ្នកនិងអ្វីផ្សេងទៀតបាន។ ហើយរបស់ទាំងអស់នេះត្រូវនាំយកពីក្រុងបាងកកមកដោយកម្មករលីសែងពី៨ទៅ១០នាក់។ ដូច្នេះនេះជាបញ្ហាភស្តុភារដ៏ធំមួយ ដើម្បីទៅដល់ទីនោះជាមួយនឹងឧបករណ៍និងគ្រឿងផ្គត់ផ្គង់ចាំបាច់"។

លោក ថមសុន ត្រូវការពេលបួនខែនៅក្នុងខេត្តសៀមរាបដើម្បីរៀបចំការធ្វើដំណើររបស់គាត់ ដែលក្នុងអំឡុងពេលនោះ គេបានហៅលោកឱ្យទៅថតព្រះមហាក្សត្រមង្គុតរបស់សៀម និងក៏បានថតរូបព្រះអង្គម្ចាស់ក្សត្រីជាច្រើនអង្គទៀត។

ដោយសារតែខេត្តបាត់ដំបង សៀមរាប មង្គលបុរី និង ស៊ីសុផុន ស្ថិតនៅក្រោមការគ្រប់គ្រងរបស់សៀមនៅពេលនោះ ដែលក្រោយមកប្រគល់ឱ្យប្រទេសកម្ពុជាវិញនៅឆ្នាំ១៩០៧ តាមរយៈសន្ធិសញ្ញាមួយរវាងប្រទេសបារាំង និង

តទៅទំព័រទី ១៦

តមកពីទំព័រទី ១២

## ច្បាប់ស្តីពីព័ត៌មានសម្ងាត់របស់រដ្ឋនឹង...

លោកបានបន្តថា "វាពាក់ព័ន្ធនឹងព័ត៌មានដែលមិនត្រូវបានផ្សព្វផ្សាយជាសាធារណៈ។ ឧទាហរណ៍ដូចជាព័ត៌មានសម្ងាត់ពាក់ព័ន្ធនឹងសន្តិសុខ ការការពារជាតិ សេដ្ឋកិច្ច បរិស្ថានជាដើម"។

អ្នកនាំពាក្យរូបនេះបានពន្យល់ថា ច្បាប់នេះរួមមានបទប្បញ្ញត្តិអនុញ្ញាតឱ្យរដ្ឋាភិបាលផ្តន្ទាទោសជនណាដែលលាតត្រដាងព័ត៌មានដែលត្រូវបានចាត់ទុកថាជាព័ត៌មានសម្ងាត់ ប៉ុន្តែបានមានប្រសាសន៍ថា លោកមិនចាំសេចក្តីលម្អិតទេ។

ទោះជាយ៉ាងណា លោក ខៀវ សុភ័គ អ្នកនាំពាក្យក្រសួងមហាផ្ទៃបានមានប្រសាសន៍កាលពីម្សិលមិញថា ក្រសួងរបស់លោកមិនទាន់បានចាប់ផ្តើមព្រាងច្បាប់នេះនៅឡើយទេ សូម្បីតែនៅលើក្រដាសក៏មិនទាន់ដែរ។

លោកមានប្រសាសន៍ថា "ការងារនេះមិនទាន់ចាប់ផ្តើមនៅឡើយទេ យើងគ្រាន់តែគិតទុកប៉ុណ្ណោះ"។ លោកមានប្រសាសន៍ទៀតថា គណៈកម្មការធ្វើសេចក្តីព្រាងច្បាប់នេះក៏មិនទាន់បានបង្កើតឡើងដែរ។

លោកបានមានប្រសាសន៍ថា "យើងគ្មានវិធានការជាក់លាក់ទេ។ យើងគ្រាន់តែគិតទុកក្នុងចិត្តប៉ុណ្ណោះថា យើងគួរតែមានច្បាប់នេះនៅពេលអនាគត"។

ដោយបន្តតាមការលើកឡើងរបស់ឧត្តមសេនីយ៍ឯក គៀត ច័ន្ទថារិទ្ធ លោកបានមានប្រសាសន៍ថា ច្បាប់នេះមានបំណងការពាររាល់ "ព័ត៌មានសម្ងាត់របស់រដ្ឋ" ប៉ុន្តែលោកបានបដិសេធមិនបញ្ជាក់លម្អិតទេ។

លោកបានលើកឡើងថា "ប្រទេសជាច្រើនមានច្បាប់នេះ ដូច្នេះកម្ពុជាគួរតែមានច្បាប់នេះដើម្បីការពារផលប្រយោជន៍របស់ជាតិ"។

ព័ត៌មានដែលបង្ហោះនៅលើគេហទំព័ររបស់នគរបាលជាតិកាលពីខែមុន លើកឡើងថា មន្ត្រីរដ្ឋាភិបាលជាន់ខ្ពស់បានធ្វើដំណើរទៅកាន់ប្រទេសវៀតណាមដើម្បីធ្វើវិធីព្រាងច្បាប់នេះ។

អស់រយៈពេលជាយូរមកហើយដែលប្រទេសវៀតណាមបានរងការរិះគន់ចំពោះការបែងចែកព័ត៌មានយ៉ាងទូលំទូលាយថាជាព័ត៌មានសម្ងាត់ និងចំពោះការប្រើប្រាស់ច្បាប់ស្តីពីព័ត៌មានសម្ងាត់របស់រដ្ឋដើម្បីចាប់អ្នកប្រឆាំងដាក់ពន្ធនាគារ។

កាលពីថ្ងៃសុក្រអាជ្ញាធរវៀតណាមបានបិទគេហទំព័ររបស់កាសែត Nguoi Cao Tuoi ដែលមានឈ្មោះល្បីល្បាញដោយសារការបោះពុម្ពផ្សាយរឿងរ៉ាវស្តីពីអំពើពុករលួយ នេះបើយោងតាមអត្ថបទមួយបង្ហោះលើគេហទំព័រជាភាសាអង់គ្លេសរបស់ Thanh Nien ដែលជាកាសែតមួយទៀតរបស់វៀតណាម។

អត្ថបទនេះបានចុះផ្សាយថា ពួកគេក៏បានដកហូតសារតាំងរបស់ព័ត៌មានរបស់និពន្ធនាយកនៃកាសែតនេះដែរ។

យោងតាមកាសែតវៀតណាមមួយទៀតឈ្មោះថា Tuoi Tre បានឱ្យដឹងថា កាសែត Nguoi Cao Tuoi ត្រូវបានពិន័យចំពោះការចុះផ្សាយអត្ថបទ "លាតត្រដាងព័ត៌មានសម្ងាត់របស់រដ្ឋ"។

លោក ព្រាប កុល នាយកប្រតិបត្តិអង្គការតម្លាភាពកម្ពុជាបានចាត់ទុកការពាក់ព័ន្ធរបស់វៀតណាមនៅក្នុងច្បាប់ស្តីពីព័ត៌មានសម្ងាត់របស់រដ្ឋក្នុងប្រទេសកម្ពុជា ថាគួរឱ្យព្រួយបារម្ភ។

លោកលើកឡើងថា អង្គការរបស់លោកគ្មានសេចក្តីលម្អិតអំពីសេចក្តីព្រាងច្បាប់នេះទេ ហើយថា លោកកំពុងសហការជាមួយអង្គការសង្គមផ្សេងៗទៀតដើម្បីស្វែងរកព័ត៌មានបន្ថែមស្តីពីច្បាប់នេះ។

លោកបានមានប្រសាសន៍ទៀតថា "ក្តីបារម្ភទី១គឺថា យើងចាំបាច់ត្រូវដឹងថា វិស័យណាខ្លះដែលរដ្ឋាភិបាលកំណត់ថាជាព័ត៌មានសម្ងាត់"។

លោក ព្រាប កុល បានបន្តថា ខណៈលោកមិនជំទាស់នឹងច្បាប់ស្តីពីព័ត៌មានសម្ងាត់របស់រដ្ឋដាច់ខាតដំណើរការធ្វើសេចក្តីព្រាងគួរតែចំហ និងមានតម្លាភាព។ លោកលើកឡើងថា "ប្រជាពលរដ្ឋយល់ពីតម្រូវការច្បាប់ដែលអាចការពារផលប្រយោជន៍របស់ប្រទេសបាន។ ប៉ុន្តែយើងចង់ធ្វើឱ្យប្រាកដថា ច្បាប់ស្តីពីព័ត៌មានសម្ងាត់របស់រដ្ឋមិនធ្វើឱ្យប៉ះពាល់ដល់សិទ្ធិរបស់ពលរដ្ឋក្នុងការទទួលបានសេរីភាពព័ត៌មាន"។

ចំណែកឯលោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រី បានមានប្រសាសន៍ថា លោកមិនដឹងទេពាក់ព័ន្ធនឹងសេចក្តីព្រាងច្បាប់នេះ៕ **សុខុម**

Continued from page 12

## Nuon Chea Breaks Silence to Question...

the trial that he would participate in the hearings and he systematically refused to answer the questions that were put to him by the civil parties," she said.

"And we note today that he chose to break his right to remain silent to put questions to Ms. Becker, who is a kind of 'VIP.'"

During the afternoon session, the author of "When The War Was Over" was asked by Anta Guisse, international co-lawyer for Khieu Samphan, whether she considered her book to be the work of a journalist or an academic.

Ms. Guisse read an excerpt from a 1986 article by well-respected historian David Chandler criticizing Ms. Becker's methodology, which he said was not sufficiently thorough, for her "ignorance of Khmer," which he said had led her to make mistakes, and for failing to properly attribute ideas taken from other sources.

Ms. Becker said she knew that Mr. Chandler had written to academics asking them not to use her book as teaching material, but expressed surprise at the criticism in the article.

"Every single journalist who has a book, you'll find a nice David Chandler blurb saying 'This is really great,' so he used [this criticism] on one journalist that I could see. And that is me. And I would note that I am the only woman journalist who wrote such a book," she said.

តមកពីទំព័រទី ០១

## ខ្មែរ-អាមេរិកាំងបានឡើងជា...

មុនពេលដែលរបបខ្មែរក្រហមចូលកាន់កាប់កម្ពុជាបន្តិចរបបនេះបានធ្វើឱ្យពលរដ្ឋខ្លួនឯងបាត់បង់ជីវិតជាង២លាននាក់ដោយទារុណកម្ម ។ ក្នុងរបបដ៏ប្រកបដោយគ្រោះថ្នាក់ដល់អ្នកដែលមានចំណេះនោះ ឪពុក លីម ដែលធ្លាប់ជានាយកសាលាបានគេចលាក់ខ្លួនជាមួយកូនប្រុសច្បងម្នាក់តែបងនោះស្លាប់ក្នុងព្រៃដោយគ្រុនចាញ់ រីឯ លីម បងប្រុស២នាក់ទៀតនៅជាមួយនឹងម្តាយធ្លាប់ជាគ្រូបង្រៀននៅជាប់ក្នុងជុំរំអ្នកទោស នាកន្លែងផ្សេងមួយទៀត ។ ដល់ឆ្នាំ១៩៧៩ ដែលវៀតណាមចូលមកដល់គ្រួសារ លីម បានជន្មៀសខ្លួនចូលជុំរំភៀសខ្លួននៅប្រទេសថៃ ក៏បានជួបជុំនឹងឪពុកវិញនៅទីនោះ ។ គ្រួសារ លីម បានត្រូវអង្គការ "ជីវ"មួយធានាឱ្យមករស់នៅសហរដ្ឋអាមេរិកនា"ហេរ៉ាល់សាន់ ខោងធី" នាបន្តិចក្រោយមក។

អ្នកទាំងអស់មិនចេះភាសាអាមេរិកាំងទេ តែលីមខំប្រឹងរៀនជាមួយគ្រូរបស់ខ្លួននៅ "ប្រេ-មេន" ដែលក្រោយមកក្លាយជាកូនធម៌របស់គ្រូបង្រៀននោះ រហូតដល់បានចូលមហាវិទ្យាល័យ "អេមូរី" ហើយ ជាប់សញ្ញាប័ត្រខាងប្រវត្តិវិទ្យា តែ លីម នៅតែបន្តការសិក្សាទៀតទៅខាងសាលាច្បាប់នៅ"សាលាមេសឿ" ។ លីម ចេញមកធ្វើការបានមួយឆ្នាំជាក្រឡាបញ្ជីឱ្យចៅក្រមម្នាក់រួចមកក៏ត្រូវបានគេជ្រើសតាំងឱ្យធ្វើជាមេធាវីនៅ "ហេរ៉ាល់សាន់ខោង ធី" ។



ចៅក្រមថ្មី ម៉េង លីម ថតជាមួយឪពុកម្តាយ



ចៅក្រមថ្មី ម៉េង លីម

ឆ្នាំថ្មីនេះ ម៉េង លីម ឡើងកាន់តំណែងជាចៅក្រមសាលាក្តីជាន់ខ្ពស់ធ្វើឱ្យឪពុកខ្លួនអាយុ៩៣ឆ្នាំ ដែលរស់នៅអាត់ត្លង់តាមានមោទនភាពជាងគេ "ខ្ញុំមិនចាំថា ឪពុកខ្ញុំធ្លាប់ឱបថើបខ្ញុំម្តងណាទេ ទើបតែបានធ្វើនៅពេលនេះ" ៕

Continued from page 01

## A Cambodian Genocide Survivor Became...

before Khmer Rouge broke in 1975. He was forced into child labor camp and worked in rice field until the liberation in 1979. Meng Lim was reunited with his mother and father, one of his older brothers; Ly meng Lim, an older sister;Fivlang Chang, and they walked over to Thailand refugee camp. In 1981, a Jewish organization sponsored the family to College Park in Fulton County, but he grew up in Haralson County near Alabama border.

His father, Se Lim, was a school principle and his motherAhn Lim was a teacher which made them the targets for extermination for being the intellectuals. "My parents would not teach us how to speak any Khmer, or discuss about which part of Cambodia they came from or how the war happened" Judge Lim said during phone interview with KhmerPost USA."It was just very difficult for my parents, my dad who was most affected by the death of my oldest brother, he just wouldn't discuss about it" he added.

At age 9th, Meng Lim had never attended a day in classroom. He got into fight on his first day in school, source says. However, he excelled very well in high school and earned a scholarship to Emory University where he studied history and earned another scholarship to Mercer Law School and graduated in 1998.

After graduation, Meng Lim worked for several Haralson County judges as a

**Continued to Page 19**

តមកពីទំព័រទី ១៤

## សៀវភៅថ្មីបង្ហាញរូបថតដំបូងៗនៃ...

ប្រទេសសៀមនោះ លោក ថមសុន ត្រូវសុំការអនុញ្ញាតពីព្រះមហាក្សត្រ មង្គុត ដើម្បីទៅអង្គរ។

លោក H.G. Kennedy នៃស្ថានទូតអង់គ្លេសប្រចាំក្រុងបាងកកបានស្មគ្រចិត្តទៅជាមួយគាត់ក្នុងនាមជាអ្នកបកប្រែភាសាថៃរបស់គាត់។ ក្នុងបរិបទនៃការប្រជែងគ្នារវាងប្រទេសបារាំង និងប្រទេសអង់គ្លេសក្នុងតំបន់ដែលប្រទេសទាំងពីរចង់បានជាខ្លាំងគឺដើម្បីពង្រីកអំណាចរបស់ខ្លួននោះ មន្ត្រីបារាំងដែលអ្នកទាំងពីរបានជួបនៅអង្គរបានសន្និដ្ឋានថា លោក កេនណេឌី ជាចារបុរស។

បន្ទាប់ពីការធ្វើដំណើរដោយថ្មើរជើងដោយរទេះគោ និងនៅពេលខ្លះដោយទូកតូចៗអស់រយៈពេលជាច្រើនសប្តាហ៍នៅទីបញ្ចប់លោក ថមសុន បានមកដល់អង្គរ។ មិនបង្អង់យូរ លោកបានថតរូបអង្គរវត្ត និងប្រាសាទបាយ័នដោយផ្តោតលើមុំដែលបានក្លាយជារូបថតក្លាសិកនៃប្រាសាទនានា។

ប៉ុន្តែការជួសជុលមិនទាន់ធ្វើទេពេលនោះ ប្រាសាទនានារុំព័ទ្ធជុំជិតទៅដោយព្រៃ។ ការសរសេរអំពីប្រាសាទបាយ័ននោះ លោក ថមសុន បានរៀបរាប់ថា "ប្រាសាទនេះរុំព័ទ្ធជុំជិតយ៉ាងក្រាស់ដោយព្រៃព្រឹក្សាលតាវល្លិ៍តោងព័ន្ធព័ទ្ធរយីងរយោង និងមានព្រៃបន្លាស្មេកស្មះ ដែលទាល់តែខំកាប់ត្រាយមួយថ្ងៃ ទើបយើងអាចឆ្ការសម្អាតតួប្រាសាទបានល្មមដើម្បីថតយករូបភាព"។

ព្រះរាជតំណាងម្នាក់របស់ព្រះមហាក្សត្រ មង្គុតក្រោយមកបានធ្វើដំណើរមកដល់អង្គរ ដើម្បីប្រគល់ព្រះរាជសារពីព្រះមហាក្សត្រដែលស្នើឱ្យលោក ថមសុន ថតរូបឱ្យបានច្រើន។ ពេលត្រឡប់ទៅក្រុងបាងកកវិញ លោកបានទទួលលិខិតមួយច្បាប់ពីព្រះមហាក្សត្រអង្គនេះ ដែលស្នើឱ្យគាត់ត្រូវរៀបរាប់ក្នុងការពិភាក្សារបស់គាត់ និងសរសេរអំពីអង្គរថា "ខេត្តបាត់ដំបង Buttabong និង អង្គរ Ongcor ឬ នគរសៀម Nogor Siam ទាំងនោះជារបស់សៀមជាប់រហូតមករយៈពេល ៨៤ឆ្នាំមកហើយ មិនត្រូវបានរារាំងដោយស្តេចខ្មែរ ឬកូសាំងស៊ីន (Cochin China) ឡើយ។ សំណង់ការពារកន្លែងទាំងនោះត្រូវបានសាងសង់ឡើងដោយរដ្ឋាភិបាលសៀមពាពឆ្នាំមកហើយ"។

លោក ថមសុន បានធ្វើតាម និងបានបញ្ចូលចុតហ្មាយរបស់ព្រះមហាក្សត្រអង្គនេះទៅក្នុងសៀវភៅរបស់លោកស្តីពីអង្គរ។

ការស្រាវជ្រាវបុរាណវិទ្យាតាំងពីយូរមកហើយបានបញ្ជាក់ថាការអះអាងរបស់ព្រះមហាក្សត្រ មង្គុត មិនត្រឹមត្រូវទេ។

បន្ទាប់ពីការធ្វើដំណើររបស់លោកនៅប្រទេសកម្ពុជាលោក ថមសុន បានស្នាក់នៅក្នុងក្រុងហុងកុង និងប្រទេសចិន ជាច្រើនឆ្នាំមុនពេលវិលត្រឡប់ទៅប្រទេសអង់គ្លេសវិញ។ នៅក្រុងហុងកុងតូដណ្តឹងរបស់លោកបានចូលរួមការងារជាមួយលោក ហើយអ្នកទាំងពីរបានរៀបការនឹងគ្នា។

ជាសមាជិកម្នាក់នៃស្ថាប័នសង្គមភូមិសាស្ត្រ និងសង្គមជាតិពន្ធុវិទ្យាដ៏មានកិត្យានុភាពនៅក្រុងឡុងលោកធ្វើសន្និសីទស្តីពីប្រទេសនានាដែលលោកបានពន្យល់បង្ហាញក្នុងស្នាដៃរបស់លោក។ នៅពេលក្រោយមកទៀត លោកបានក្លាយជាជាងតំនូររូបថតសង្គមទំនើបម្នាក់នៅក្រុងឡុង និងបង្រៀនការថតរូបដែរ។ លោកបានទទួលមរណភាពនៅឆ្នាំ១៩២១ ក្នុងវ័យ៨៤ឆ្នាំ។

ដូចដែលបានឃើញក្នុងសៀវភៅនេះស្រាប់ លោក ថមសុន ចាប់អារម្មណ៍យ៉ាងពិសេសលើមនុស្សពោលគឺលោកមិនអាចថា មិនបញ្ចូលប្រជាជនខ្មែររួមជាមួយរូបថតអង្គររបស់លោកបានទេ។

លោក ម៉ុនថេក និងលោក មីហ្សិស្តី សរសេរថា "រូបថតរបស់លោក ពិសេសបំផុត រូបថតប្រទេសចិននិងក្រុងឡុងបានផ្តល់នូវរូបមនុស្សពិត និងនៅដក់ជាប់យ៉ាងពិសេសនៃមនុស្សគ្រប់ស្រទាប់វណ្ណៈទាំងអស់ គឺមានចាប់ពីស្តេចរហូតដល់អ្នកសុំទាន"។

ក្នុងជំពូកមួយស្តីពី "នាមប័ណ្ណ" ដែលជានាមប័ណ្ណជំនាន់ដើមរូបថតមានចាប់ពីក្មេងស្រីធម្មតានៅដែនដី កូសាំងស៊ីន ដល់អ្នកលក់អំពៅម៉ាឡេ និងព្រះអង្គម្ចាស់ភាគខាងកើត។

មានបញ្ចូលក្នុងសៀវភៅនោះដែរ គឺរបាយការណ៍ដ៏កម្រមួយស្តីពីប្រទសកម្ពុជារបស់លោក កេនណេឌីជាមន្ត្រីនៅស្ថានទូតអង់គ្លេសដែលបារាំងសង្ស័យថាជាចារបុរស។

អ្នកនិពន្ធជាច្រើនសរសេរអំពីសេចក្តីរាយការណ៍ថា "ប្រហែលជាការវិភាគអំពីប្រទេសកម្ពុជាត្រឹមត្រូវ និងល្អិតល្អន់បំផុត ជាភាសាអង់គ្លេសពីពាក់កណ្តាលសតវត្សរ៍ទី១៩នោះ"។ លោក កេនណេឌី បានកត់សម្គាល់ថា បារាំងបានដឹងអំពីសារៈសំខាន់របស់ប្រទេសកម្ពុជា ហើយពង្រីងឥទ្ធិពលរបស់ខ្លួននៅតំបន់ខាងកើតមានផែនការរក្សាទុកវាជា "រាជាធិបតេយ្យដ៏សំខាន់មួយស្ថិតក្រោមការមើលខុសត្រូវរបស់ខ្លួនផ្ទាល់" ជាការបង្ហាញដែលសង្ខេបយ៉ាងច្បាស់ គឺអាណាព្យាបាលបារាំងតែម្តង។

សៀវភៅនេះបញ្ចប់ទៅដោយការបោះពុម្ពផ្សាយជាថ្មីនូវសៀវភៅរូបថតដំបូងរបស់លោក ថមសុន អំពីប្រទេសចិន។ មានចំណងជើងថា "ទស្សនីយភាពលើទន្លេខាងជើង" នោះ សៀវភៅស្តើងនេះកម្រឃើញមានណាស់សព្វថ្ងៃនេះ។

ស្នាដៃនេះស្តីពីលោក ថមសុន ប្រាប់រឿងរ៉ាវនៃបុរសផ្សងព្រេងម្នាក់ដែលមានសមត្ថភាពធ្វើឱ្យការធ្វើដំណើរពិសេសក្លាយជាការពិត។ លោកក្លាយជាអ្នកថតរូបដ៏ចំណានម្នាក់។ រូបថតរបស់លោកស្អាតមែនទែន និងស្របតាមពេលវេលាដែលឆ្លងកាត់យ៉ាងលំបាក។

សៀវភៅនេះចាប់ផ្តើមជាមួយនឹងការដកស្រង់សម្តីពីលោក រ៉ូសាលីន ម៉ូរីស នរវិទូនៅសាកលវិទ្យាល័យកូឡុំប៊ី នៅញូវយ៉ក ដែលសង្ខេបយ៉ាងត្រឹមត្រូវនូវឆន្ទៈមោះមុតរបស់អ្នកនិពន្ធស្ថិតនៅពីក្រោយការធ្វើកិច្ចការដ៏លំបាករយៈពេលបួនឆ្នាំដើម្បីផលិតចេញសៀវភៅមួយក្បាលស្តីពីសារព័ត៌មានរូបថតដំបូងគេ "ទោះជាយើងប្រហែលស្ទាក់ស្ទើរក៏ដោយ ក៏យើងដែលជានរវិទូនិងប្រវត្តិវិទូផ្នែករូបថតនៅអាស៊ីបូព៌ានិងអាស៊ីអាគ្នេយ៍សុទ្ធតែជាអ្នកស្នងមរតករបស់លោក ចន ថមសុន ដែរ"៕ **មានិត**

## តមកពីទំព័រទី ០៦ បទសម្ភាសន៏ជាមួយព្រះអង្គម្ចាស់ស៊ីសុវត្ថិ...

**ស.ធម្មិកោ:** ខ្ញុំមិនហ៊ានចង្អុលថា នរណាទេ តែច្បាស់ជាមានហើយ ។

**សួរ:** នៅពេលដែលទ្រង់ រណឫទ្ធិ ចូលគណបក្ស ហ្វុនស៊ិនប៉ិចវិញ ថ្មីៗនេះ បានត្រូវគេបកស្រាយថា នេះគឺជាកលល្បិចលោក ហ៊ុន សែន សម្រាប់បំបែកសន្លឹកឆ្នោតរបស់សង្គ្រោះជាតិកុំអោយបក្សប្រឆាំងអាចយកឈ្នះបាន តើព្រះអង្គមានមើលឃើញនយោបាយរបស់គណប្រជាជននៅមានអ្វីទៀតទេ?

**ស.ធម្មិកោ:** គណបក្សប្រជាជនកម្ពុជាអស់មានអ្វីជានយោបាយទៀតហើយ នៅសល់តែល្បិចតែប៉ុណ្ណោះ ហើយល្បិចដែលនឹងប្រើនោះ ក៏គេដឹងទៅហើយទៀត ហើយខ្ញុំមិនជឿថា គណបក្សហ្វ៊ុនស៊ិនប៉ិចអាចនឹងដណ្តើមសម្លេងពីសង្គ្រោះជាតិបានទេ គឺដណ្តើមពីគណបក្សប្រជាជនទៅវិញទេ រីឯខាងលោក សួណាន់ដួឬលោក គីម ឡី ខ្ញុំមិន ជឿថា នឹងទៅបើកគណបក្សថ្មីអីទេ ពីព្រោះអ្នកទាំងនោះក៏ចង់អោយឆ្នោតនៅមូលខាងសង្គ្រោះជាតិ ដើម្បីអោយមានការផ្លាស់ប្តូរដែរ ។

**សួរ:** នៅសំនួរជាចុងក្រោយនេះ ព្រះអង្គមានជំនឿខ្លាំងថា គណបក្សសង្គ្រោះជាតិនឹងឈ្នះឆ្នោតនៅឆ្នាំ២០១៨ តើសំអាងទៅលើអ្វី?

**ស.ធម្មិកោ:** ចាប់តាំងពីឆ្នាំ១៩៩៣ មកទល់នឹង ២០១៣ សម្លេងឆ្នោតរបស់គណបក្សប្រជាជនមិនដែលលើស៣៣ភាគរយនៃចំនួនអ្នកបោះឆ្នោតទេ បានន័យថានៅមាន៦៧ភាគរយទៀត ដែលមិនដែលបោះឆ្នោតអោយគណបក្សប្រជាជនសោះត្រង់នេះសំខាន់ណាស់ ! តួរលេខនោះនឹងចុះបន្តរទៅទៀត ដោយគណបក្សប្រជាជនកំពុងតែបាត់បង់មូលដ្ឋានរបស់ខ្លួន ។ ផ្ទុយទៅវិញ គណបក្សសង្គ្រោះជាតិ ថ្មីត្បិតតែមិនទាន់យូរ គឺឈរលើនយោបាយ២ គឺបូរណភាពទឹកដីនឹងសុខុមាលភាពប្រជាពលរដ្ឋដែលជាមាតិកាយូរអង្វែងរបស់ព្រះកូណាររោត្តម សីហនុ។ ឆ្នាំ២០១៣ យើងបានឈ្នះទៅហើយ នៅឆ្នាំ២០១៧ នឹង១៨ គ.ជ.ប.នឹងឈប់បំរើគណបក្សប្រជាជនយើងនឹង ឃើញថាសម្លេងពលរដ្ឋដែលចង់ផ្លាស់ប្តូររបបនឹងលេចចេញឡើង ផ្តល់ជ័យជំនះឱ្យគណបក្សសង្គ្រោះជាតិនៅក្នុងការបោះឆ្នោតឃុំសង្កាត់នឹងនៅសភាជាតិ ៕

**ពិនសំខុន:** សូមអរព្រះគុណ !



ប្រធានយុវជនសង្គ្រោះជាតិថ្លែការណ៍នៅហ្វីឡាដែលហ្វៀ

**KhmerPost USA, LLC**
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office)
អ៊ីម៉ែលsobenpin@khmerpost.us

អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**
Kim Phien, Richard Howe,Jr.

ច្នៃសោភ័ណភាពកាសែត **Design Artist**
Heng Chhunleng
នាយករដ្ឋបាល Office Manager **978-677-7163**
Thach Vanna ថាច់ វណ្ណា

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at 100.00 or 120 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

Continued from page 13

# First photographer

William Thompson in Singapore by boat trip with fiance his brother for a month, he has started to become a photographer.

Asia battery acid immediately began photographing until sold in the port city of progress. This business has made his trip to the region settled Straits (Straits Settlements), the British colonial territory, where a large part of today Malaysia, an experience that later compiled into a book titled "The Malacca Strait" In the book, he describes Malaya as "a place where the holiday seems to be located at the entrance of the Everyone feels like a break because a calm sea, and there are also enormous palm trees with large leaves his political luxury homes that suffered the impact of weather factors.

But publishing the work of Mr. tired in 1863 and 1864 in Europe, given Mr. Thompson is a new purpose Siam, later known as Thailand and from there went on a trip to Angkor. When he wrote his book on Angkor "mentioned in the works of Mugabe tired about the prosperity of cities The division, which the author found in the middle of the jungle in Cambodia has persuaded me not only made me determined visit Thailand, but also travel across the country and into the country in order to explore and break the country's divided, "he said.

Although use of modern imaging technology most of that time, this immensity than just packing a camera.

Mainly explained about the film (wet-plate) that is used by a photographer in the late 1860s, "photographer thick mixture then words Play it on a glass plate graphics bumps bumps Film folding make it today, then drain it out to avoid wrinkles or something on it. Then they use chemicals to make the film was light and was immediately snapped it immediately wet it yet. "

However, if you're in the middle of the jungle in Cambodia, that means you have to have a half a dark room with a bottle of chemicals In order to do this, and toxic chemicals that can cause eye irritation and anything else. And all of this was taken from Bangkok by workers, porters, from 8 to 10 people. So this is a huge logistical problems in order to get there, with the necessary equipment and supplies. "

Mr. Thompson was four months in the province to prepare his travel during that time they called him to Thai King's Bend and photographed him Queen many times.

Mongkol because of Battambang, Siem Reap and Sisophon under the control of Siam at the time, who later returned to Cambodia in 1907 through a treaty between France and Thailand, Thompson must ask permission from the King Sitting to Angkor.

After his trip, Mr. Thompson to stay in Hong Kong and China for several years before returning to Britain . In Hong Kong, his fiancée joined with him, and the two were married.

A member of the national geographic society and social institutions, prestigious genetics at the London Conference on countries Commenting in his work. Later, he became a painter photo modern society, one in London and teaches photography. He died in 1921 at the age of 84 years.

As seen in this book, Tom Johnson particularly interested in people, that is, he can not enter Khmer people with Photos of Angkor's.

Richmond lenses and mainly writes that "most special photo photo China and London offers real people and put special people of all walks of life, all are from the king until you beg. "

In a chapter on "business cards" business cards of old photos from local girls usually Cochin Malay cane vendors and shareholders East.

Included in the books, it is a rare report on Cambodia's Kenny Darussalam British embassy officials in France suspected spy.

Many writers write about reports that "perhaps the analysis about the country and the most elaborate in English from the mid-19th century ". Ken Neng noted that France was aware of the importance of the country and strengthen its influence in the region, the East has a plan to save It's a "major monarchy under its own responsibility," an indication that the summary is clearly French time.

The book ends with a new publishing his first photo book, Tom Johnson of China. Titled "Scene on the North River", thin books very rare today.

This works on Tom Johnson, adventure tells the story of a man who is capable of making the trip a reality. He became a star photographer. Photo's very pretty, and as time passes very hard.

The book starts with a quoted Mr. Salin Morris anthropologist at Columbia University in the City of New York, who correctly summarized the dedication author behind the hard work the past four years to produce a book on the first press photo "Despite We may hesitate, we as anthropologists and historians photo in East Asia and Southeast Asia are the heir of John Tom Johnson. "Republic.

Continued from page 16

## A Cambodian Genocide Survivor Became...

clerk for a year before he was hired by the law firm of House speaker Tom Murphy where he worked for another year. It was only a natural progression that Meng Lim then became the Haralson County Attorney where he has served in the last 10 years prior to his campaign running for the Superior Court Judge's seat.

On July 22nd, 2014 runoff election - the Haralson County attorney had an impressive win of 62% of the votes, where Asian voters consisted of .3%, against Chuck Morris, a juvenile court judge of Polk County.

Judge Meng Lim is the father of two children, Elizabeth, 10 and Nicholas, 5. He marked the first Cambodian American ever elected Superior Court Judge, not only in the State of Georgia but in the United States. "The main thing is trying to be appreciative of the freedom of this country gave us, remember where we came from and always try to do the right things, and try to be helpful to others who surround you and to give back to the community when you can" said Judge Lim as we closed the interview.




Continued from page 12

## State-Secrets Law to Be

prosecute anyone who revealed information deemed secret, but said he could not recall specifics.

Interior Ministry spokesman Khieu Sopheak, however, said yesterday that his ministry had not yet begun drafting the law-at least not on paper.

"Nothing has been worked on yet," he said. "It's just in our minds."

General Sopheak said a committee to draft the law had not been set up, either.

"We don't have any concrete measures," he said. "We just keep in mind that we should have this law in the future."

Echoing Lt. Gen. Chantharith, he said the law would be meant to protect all "secrets of the state," but refused to elaborate.

"Many countries have this law, so Cambodia should have this law to protect the interest of the nation," he said.

A post on the National Police website last month says senior government officials have been traveling to Vietnam to learn how to draft the law.

Vietnam has long been criticized for broadly classifying information as secrets and using its own state-secrets law to jail dissidents.

Last Friday, Vietnamese authorities shut down the website of the Nguoi Cao Tuoi newspaper, which had gained a reputation for publishing stories about corruption, according to an article posted to the English-language website of Thanh Nien, another Vietnamese newspaper.

They also revoked the press credentials of the paper's editor-in-chief, the article says.

According to Tuoi Tre, yet another Vietnamese newspaper, Nguoi Cao Tuoi was being punished for running stories "disclosing state secrets."

Preap Kol, executive director of Transparency International Cambodia, called Vietnam's involvement in Cambodia's state-secrets law concerning.

He said his organization did not have details about the draft law and that he was working with other civil society organizations to find out more information about it.

"The first concern is we need to know what are the areas the government defines as secrets," he said.

Mr. Kol said that while he was not wholly opposed to a state-secrets law, the drafting process should be open and transparent.

"People understand the need [for] a law that may protect the interests of the country," he said. "But we want to make sure the [state] secret law doesn't compromise the citizens' rights to freedom of information."

Council of Ministers spokesman Phay Siphan said he was not aware of the draft law.

# ទទួលទានត្រីជួយបង្កើនគុណភាពមេជីវិតបុរស



ត្រី(Fish) ត្រូវបានគេស្គាល់យ៉ាងច្បាស់ថា ជាប្រភពជាតិខ្លាញ់អូមេហ្គា-៣ (Omega-3) ដែលជាជាតិខ្លាញ់ល្អបំផុតចំពោះសុខភាព ។ ហើយនៅពេលថ្មីៗនេះ អ្នកជំនាញផ្នែកសុខភាពបានឱ្យដឹងថា បុរសទាំងឡាយ ប្រសិនបើចង់ឱ្យមេជីវិត (ស្ពែម) រឹងមាំនិងមានគុណភាពល្អអ្នកគួរទទួលទានត្រីឱ្យបានច្រើន។ ក្រុមអ្នកស្រាវជ្រាវមកពីសាកលវិទ្យាល័យអ៊ីលីណយស៍ (University of Illinois) បានឱ្យដឹងថា មូលហេតុគឺជាតិខ្លាញ់អូមេហ្គា-៣ មានការពាក់ព័ន្ធនឹងរូបរាងមេជីវិត។ លោក ទីម៉ូធី អាប់បុតត៍ (Timothy Abbott) ជាសហអ្នកនិពន្ធមួយរូបនៃការសិក្សានេះ បាននិយាយ-ថា តាមធម្មតាមេជីវិត (ស្ពែម) មានក្បាលរាងដូចមួកដែលគេហៅថា "អាក្រូសូម" (Acrosome)។ ហើយអង់ហ្ស៊ីមនៅត្រង់ផ្នែកក្បាលមានតួនាទីជ្រែកចូលទៅក្នុងស៊ុតដើម្បីបង្កកំណើត។ អង់ហ្ស៊ីមទាំងនោះ ត្រូវការជាតិខ្លាញ់អូមេហ្គា-៣ ដើម្បីលូតលាស់ធ្វើឱ្យក្បាលមេជីវិតកាន់តែស្រួច និងមានខ្លួនកាន់តែវែង។ ផ្ទុយទៅវិញ នៅពេលដែលវាទទួលបានជាតិអាស៊ីដខ្លាញ់អូមេហ្គា-៣ មិនគ្រប់គ្រាន់ធ្វើឱ្យរូបរាងរបស់មេជីវិតលូតលាស់មិនបានល្អ និងធ្វើការមិនបានពេញលេញនោះឡើយ។ ម្យ៉ាងទៀត ក្រុមអ្នកវិទ្យាសាស្ត្របានចាប់ផ្តើមធ្វើការសិក្សាលើមេជីវិតរបស់បុរស បន្ទាប់ពីរកឃើញថា សត្វកណ្តុរ ដែលមានជាតិអាស៊ីដខ្លាញ់ មិនគ្រប់គ្រាន់ធ្វើឱ្យគុណភាពមេជីវិតថយចុះតែនៅពេលគេបន្ថែមសារធាតុខ្លាញ់អូមេហ្គា-៣ ចូលទៅក្នុងអាហារមេជីវិតរបស់សត្វកណ្តុរទាំងនោះ ត្រឡប់មកជាមានគុណភាពល្អវិញ។ រីឯការសិក្សាមួយទៀត ដែលធ្វើឡើង ដោយសកលវិទ្យាល័យហាវ៉ាដ (Harvard University) បានឱ្យដឹងថា កង្វះជីវជាតិអាចធ្វើឱ្យគុណភាពមេជីវិតថយចុះដូចគ្នាទៅនឹងអ្នកដែលទទួលទានអាហារដែលមានជាតិខ្លាញ់ច្រើនផងដែរ ។ ដូចនេះប្រការល្អបំផុត គឺអ្នកត្រូវទទួលទានត្រីឱ្យបានច្រើន ដូចជាត្រីសាលម៉ន ឬត្រីធូណា ជាដើម បូករួមជាមួយនឹងអាហារផ្សេងៗទៀត ដូចជាស៊ុត ទឹកដោះគោសណ្តែក គ្រាប់ធញ្ញជាតិ ផ្លែឈើពពួកប៊ីរី ដំឡូងជ្វា ឬប្រូកខូលី និងបន្លែបៃតងនានា៕



# ការទទួលទានផ្លែប័រច្រើនបង្កឱ្យរបួសថ្លើម



ផ្លែប័រ សម្បូរវីតាមីន និងសារជាតិរ៉ែមានប្រយោជន៍សម្រាប់សុខភាពមនុស្ស រួមមាន កាល់ស្យូម,ដែក,ស្ពាន់,ម៉ាញ៉េស្យូម,ហ្វូសហ្វ័រ, ប៉ូតាស្យូម,សូដ្យូម...។ ជាងនេះទៀត ផ្លែប័រនៅជួយបង្ការជំងឺសរសៃឈាមបេះដូង,បន្ថយកូឡេស្តេរ៉ូលអាក្រក់,បង្ការប្រឆាំងមហារីក កែប្រែប្រសើរឡើងចក្ខុប្រសាទ...។ ប៉ុន្តែពុំមែនទទួលទានកាន់តែច្រើន កាន់តែនាំមកនូវផលប្រយោជន៍ល្អនោះឡើយ ។ ពួកអ្នកស្រាវជ្រាវនៅអាមេរិក បានបញ្ជាក់ថា ក្នុងផ្លែប័រមានផ្ទុកសារជាតិមួយចំនួនជួយប្រឆាំងមហារីក ។ សារជាតិចម្រុះនោះអាចរកឃើញកោសិកាមានលទ្ធភាពបង្កមហារីក និងកំទេចវា ដោយមិនបង្កគ្រោះថ្នាក់ដល់កោ-សិកាល្អ ។ ដូចជា ប្រេងអូលីវដែរ, ផ្លែប័រមានផ្ទុកអាស៊ីត Oleic ក្នុងបរិមាណខ្ពស់គួរសម ។ នេះជាប្រភេទអាស៊ីតជួយទប់ស្កាត់មហារីកសុដន់ ។ ផ្លែប័រនៅផ្ទុកបរិមាណ lutein carotene ខ្ពស់ជាងផ្លែឈើដទៃទៀត ។ សារជាតិនេះជួយទប់ស្កាត់ជំងឺភ្នែកមួយចំនួន ។ ក្រៅពីនេះ ផ្លែប័រសម្បូរ beta-sitosterol ជាសារជាតិចម្រុះមួយធ្វើឱ្យថយចុះអត្រាកូឡេស្តេរ៉ូល ។ បើតាមការស្រាវជ្រាវមួយបានបង្ហាញថា ការទទួលទានផ្លែប័រ ១ផ្លែ ក្នុង១ថ្ងៃ នឹងបន្ថយអត្រាជាតិខ្លាញ់ចុះប្រមាណ១៧ភាគរយ តែក្នុងរង្វង់១សប្តាហ៍ ។ ទោះបីផ្លែប័រមានសារប្រយោជន៍ច្រើន សម្រាប់សុខភាពតែយើងមិនត្រូវទទួលទានច្រើនពេក ព្រោះវាអាចបណ្តាលឱ្យរបួសថ្លើម ដោយសារនៅក្នុងផ្លែប័រ មានផ្ទុក collagen ច្រើន ។ ប្រសិនទទួលទានច្រើន collagen អាចមិនត្រូវបានរំលាយអស់ប្រមូលផ្តុំក្នុងថ្លើម និងបង្កគ្រោះថ្នាក់ឱ្យថ្លើម។ ការទទួលទានផ្លែប័រច្រើននៅធ្វើឱ្យឡើងទម្ងន់ អាលែកហ្ស៊ី និងឥទ្ធិពលទៅដល់ប្រសិទ្ធភាពរបស់ថ្នាំមួយចំនួន ។ ប្រសិនអ្នកកំពុងប្រើថ្នាំធ្វើឱ្យឈាមរាវនោះ ត្រូវសួរយោបល់វេជ្ជបណ្ឌិតពេលចង់ទទួលទានផ្លែប័រ ។ អ្នកដែលអាលែកហ្ស៊ីជាមួយស្ករកៅស៊ូច្រើន មានហានិភ័យអាលែកហ្ស៊ី ជាមួយផ្លែប័រ យ៉ាងខ្ពស់ ដោយមានរោគសញ្ញា ដូចជា វិលមុខ,រមាស់,ចង់ក្អួត... ពេលទទួលទានផ្លែប័រ ៕



# ស៊ូឱ្យមានមិត្តច្រើនជាជាងបង្កើនសត្រូវច្រើន

**តពីលេខមុន**

រីឯមិត្តជាកល្យាណមិត្តពិតប្រាកដត្រូវតែរត់ចេញឆ្ងាយដើម្បីប្រមែប្រមូលសាធារណជនគ្រប់ជាន់ថ្នាក់អោយដកថយចេញពីអត្តទត្តបុគ្គលអញ្ញនិយម គឺមានតែបានមិត្ត ឬបច្ចាមិត្តដែលនៅជុំវិញខ្លួន ហើយមិនយូប៉ុន្មានវាសនាជតារាសីរបស់ខ្លួន អំណាច និងបុណ្យសក្តិរបស់ខ្លួនត្រូវតែដល់ទីបញ្ចាប់ ហើយរលាយបាត់បង់ពីរូបកាយអស់រលីងទៅជាស្ថាបពរដែរ។

ដោយយោងតាមប្រធានចារស៊ូអោយមានមិត្តច្រើនជាជាងបង្កើនសត្រូវច្រើន គឺជាប្រធានបទមួយចង់បញ្ជាក់បង្ហាញទៅដល់ប្រទេសដឹកនាំកំពូល និងពពួកនាម៉ឺនសព្វមុខមន្ត្រីគ្រប់ជាន់ថ្នាក់ដែលកំពុងតែដឹកគ្រប់គ្រងប្រទេសជាតិសព្វថ្ងៃ សូមអោយខំប្រឹងបើកភ្នែកសំឡឹងមើលជុំវិញខ្លួនអោយមែនទែន និងបើកត្រចៀកខំផ្ទៀងស្តាប់អោយឮច្បាស់មែនទែន អំពីមិត្តនិងសត្រូវដែលអស់លោកគ្រប់គ្នាចង់បាននិងមិនចង់បាន។ បើសិនជាអស់លោកបានតាំងខ្លួនជាអ្នកប្រាជ្ញបណ្ឌិតមែនលោកត្រូវតែយល់និងដឹងអោយច្បាស់អំពីមិត្ត និងសត្រូវនេះ ពាក្យថា មិត្តអាចមានន័យពីរខុសគ្នាស្រឡះ គឺកល្យាណមិត្ត និងបាបមិត្ត បបច្ចាមិត្តឬសត្រូវតែម្តង។

បើសិនជាអស់លោកគិតយល់ និងដឹងថា បាបមិត្តនោះវាល្អប្រសើរខ្លាំងណាស់សម្រាប់អស់លោកក៏ជាការល្អសម្រាប់ខ្លួនអស់លោកហើយ ហើយអ្វីៗដែលអស់លោកប្រព្រឹត្តនិងគោរពប្រណិបត្តិនោះ ក៏និងអោយលទ្ធផលផ្លែផ្កាទៅតាមនោះដែរ។

ចំណែកបុគ្គលផ្សេងទៀត ដែលគេយល់ និងដឹងថា គឺកល្យាណមិត្តដែលប្រកបដោយអធ្យាស្រ័យល្អប្រពៃនោះហើយដែលជាពំនឹងពឹងពាក់អាស្រ័យរវាងគ្នាជាប់ជានិច្ច ដើម្បីស្វែងរកសេចក្តីសុខសន្តិភាពរីកចំរើនលូតលាស់គ្រប់វិស័យរុងរឿងថ្កើងថ្កានុត្តុងឧត្តម និងសុភមង្គលក្នុងសង្គមជាតិទាំងមូលនោះ។ ជាការពិតណាស់លទ្ធផលផ្លែផ្ការមែងកើតចេញមក និងបានជាទីពេញចិត្តពេញថ្លើមនៃសាធារណជនគ្រប់ជាន់ថ្នាក់ទាំងក្នុង និងក្រៅប្រទេសដោយសារតែអារីយបុគ្គលទាំងនោះបានប្តេជ្ញាតាំងចិត្តជានិរន្តភាពជាស្រេចថា ស៊ូអោយមានមិត្តច្រើនឡើង ជាជាងបង្កើនសត្រូវច្រើនឡើងនោះ ពិតជាការល្អត្រឹមត្រូវណាស់៕

តមកពីទំព័រទី ១

## ទីក្រុងឡូវែលមានព្រិលធ្លាក់...

២០១៤-២០១៥,នៅក្រុងឡូវែល មានព្រិលធ្លាក់ច្រើនជាងគេបំផុតតាំងពីឆ្នាំ១៨៩១(គឺ១១៤ឆ្នាំ)។

មកដល់ថ្ងៃនេះ១៦កុម្ភៈ,ក្រុងឡូវែល មានព្រិលធ្លាក់ច្រើនជាងគេបំផុតទូទាំង ស.រ.អា.,ទីក្រុងបន្ទាប់មកគឺ: វូស្ទើ (Worcester) ១០៣ អ៊ីញឆ៍ ទីក្រុងបូស្តុន(Boston)៩៥អ៊ីញឆ៍,ទីក្រុងបាបផាឡូ,នីវ យ៉ក(Buffalo,NY).៩៦ អ៊ីញឆ៍, ទីក្រុងអែ រី,ផែនស៊ីវ៉ាញ៉ា(Erie,PA)។ ៩១អ៊ីញឆ៍,នឹងទីក្រុង សៃរ៉ាខែស,នីវយ៉ក(Syracuse NY).៨៦ អ៊ីញឆ៍។

ផ្នែកកៀរកើបបញ្ជូនព្រិលក្រុងឡូវែល បានធ្វើការទាន់ពេលក្នុងចម្ងាយផ្លូវ២៥៣ ម៉ាយល៍,ប៉ុន្តែនៅសេសសល់លើចិញ្ចើមថ្នល់នាផ្លូវបែក និងផ្លូវប្រសព្វមុខគ្នាធ្វើឱ្យមានការលំបាកក្នុងការពិនិត្យចរាចរ, ព្រោះគំនរព្រិលបាំងភ្នែកអ្នកបើកបរ, ម្យ៉ាងទៀតព្រិលធ្វើឱ្យផ្លូវចង្អៀតមានការលំបាកក្នុងការបើកប្រជែងទៅមុខផងដែរ។

ដើម្បីភាពងាយស្រួលដល់ការកៀរព្រិល,ទីក្រុងឡូវែលបានប្រកាសហាម-មិនឱ្យចតឡានរាល់ពេលព្យុះព្រិលចាប់ផ្ដើមធ្លាក់ រថយន្តណាមួយដែលបានចត់តាមផ្លូវក្នុងពេលធ្លាក់ព្រិល និងត្រូវទទួលការពិន័យ ឬត្រូវគេអូសដឹកយកចេញ។ បន្ទាប់មកចេញបទបញ្ជាឱ្យអ្នកម្ចាស់ផ្ទះទាំងអស់ទទួលខុសត្រូវក្នុងការកៀរសកើបព្រិលនៅតាមចិញ្ចើមថ្នល់ និងដីបន់ជុំវិញផ្ទះដែលជាកម្មសិទ្ធរបស់ខ្លួនក្នុងរយៈពេល ១២ម៉ោងក្រោយពេលធ្លាក់ព្រិលសម្រាប់ផ្ដល់ភាពងាយស្រួលដល់អ្នកធ្វើដំណើរតាមចិញ្ចើមថ្នល់ប្រសើរជាងការដើររួមផ្លូវដែលឡានកំពុងបើកបរ ហាមមិនឱ្យបោះ ឬចោលព្រិលទៅលើថ្នល់ឡាន, អ្នកដែលបានប្រព្រឹត្តដូច្នេះនឹងត្រូវទទួលពិន័យ។

មានបញ្ហាមួយចំនួនទៀតដែលប្រជារាស្ត្រយើងគួរធ្វើក្រោយពេលព្រិលធ្លាក់នោះ គឺត្រូវកៀរសំអាតព្រិលជុំវិញរន្ធបញ្ចេញកម្ដៅពីក្នុងផ្ទះ,សំអាតជុំវិញបំពង់ទឹកសម្រាប់ពន្លត់អគ្គីភ័យប្រសិនមានបំពង់ទឹកនៅក្បែរផ្ទះរបស់ខ្លួន។

ព្រិលអាចបណ្ដាលឱ្យខូចដំបូលផ្ទះក្នុងខណៈដែលព្រិលចាប់ផ្ដើមរលាយហូរចុះមកដំបន់ទំនាបនៅលើដំបូលផ្ទះ,រួចពេលត្រជាក់ក៏ចាប់ផ្ដើមកកជាទំនប់ទឹកកកដែលគេហៅថា:(iceDam)បានរាំងជាប់ផ្លូវទឹក,ពេលព្រិលរលាយសារក្រោយ និងរាំងស្ទះរួចហូរច្រាល់ទៅទីដទៃៗទៀត ឬលិចចូលទៅក្នុងផ្ទះ និងតាមមាត់បង្អួចជាដើម។

ក្នុងសិសិររដូវ, ការកៀរសព្រិលលើដំបូលផ្ទះមានការលំបាក និងប្រកបដោយគ្រោះថ្នាក់,យើងគួររកជួលអ្នកស្ទាត់ជំនាញខាងកៀរសព្រិល និងគោះទំនប់ទឹកកកលើដំបូលផ្ទះមកធ្វើប្រសើរជាង។ បន្ទាប់មក យើងអាចនិងបាចអំបិលសម្រាប់រំលាយព្រិលទៅលើដំបូល សម្រាប់ជុំនួយក្នុងការរំលាយព្រិលឱ្យបានឆាប់។

មធ្យោបាយល្អម្យ៉ាងទៀត,ប្រសិនជាយើងអាចស៊ូទ្រាំបានក្នុងរយះពេល១ខែទៀត,រដូវព្រិលធ្លាក់នឹងបានកន្លងផុតទៅ។



រុក្ខជាតិផ្កាភ្ញីនឹងដុះលូតលាស់ឡើងពាសពេញពសុធា,ដូចអ្នកនិពន្ធល្បីល្បាញម្នាក់ឈ្មោះម៉ាក ថ្វេនបាននិយាយថា: ប្រសិនជាអ្នកមិនចូលចិត្តអាកាសធាតុនៅនូវ អ៊ីងឡឹន (New England) ឈប់ចាំបន្តិចសិនវា និងមានការដូរផ្លាស់៕

Continued from page 01

## Lowell: the Snowiest City in...

The city of Lowell Public Works Department has done a fine job of removing snow from the city's 253 miles of streets. Still, large snowbanks dangerously reduce visibility at intersections and make already narrow streets very tight for passing cars. To assist with snow removal, the city usually declares a parking ban when a snowstorm begins. Anyone who leaves his car parked on the street during a parking ban may get a ticket or have his car towed.

A city ordinance also requires property owners to clear snow from all sidewalks that run along your property within 12 hours of the end of the storm. This is to permit people to walk on the sidewalks rather than be forced to walk in the streets. When clearing sidewalks and your driveway, however, do not throw snow into the street. The city will penalize you for doing that.

There are other things people should do after a snowstorm. Clear snow away from vents for your home heating system. Clear snow from any nearby fire hydrant so it will be quickly available if there is a fire in the neighborhood.

All of this snow has also caused problems with roofs of houses. When rooftop snow begins to melt, it often freezes at the edge of the roof creating a ridge of ice. This is called an "ice dam" and it blocks other water from flowing off of the roof. That water has to go somewhere so it usually leaks into your house, often through a light fixture or window frame. Because working on a roof in the winter is very dangerous, it is best to hire a professional to remove an ice dam although some people fill up a sock with chemical ice melt and toss it up on the roof, hoping it will melt a channel through the ice to release the water.

One thing that makes all of this snow easier to tolerate is knowing that spring is just a month away. Soon the snow will be gone and flowers will be pushing up through the ground. As the famous American writer, Mark Twain, once said, "If you don't like the weather in New England, wait a minute and it will change."




The Cambodian-American Biweekly Newspaper

សារព័ត៌មានខ្មែរ-អាមេរិក ចេញពីរសប្តាហ៍ម្តង

a free local newspaper reaching over 20,000 Cambodian readers in the Greater Lowell area every two weeks

ផ្តល់ជូនកាសែតឥតគិតថ្លៃដល់អ្នកអានខ្មែរច្រើនជាង២០០០០នាក់នៅតំបន់ឡូវែលរាល់ពីសប្តាហ៍ម្តង

**Soben Pin, Managing Partner** អ្នកគ្រប់គ្រង សុបិន្ត ពិន

## 978.677.7163 (Office) 978. 656.8141 (Mobile)

សូមកក់ពាណិជ្ជកម្មអ្នកជាមួយយើងខ្ញុំ ហើយទទួលបានការបញ្ចុះតម្លៃ២០%

## Reserve Your 2015 Ads with us today and receive up to 20% OFF!

### Sample of our affordable pricing បញ្ជីតម្លៃពាណិជ្ជកម្មក្នុងតម្លៃសមរម្យ

| ទំហំទំព័រ Page Size | ប្រវែង Length x Width | ១ខែ 1 month 10%OFF |
|---|---|---|
| 1/2 page color | (6.5"x10") | $484 |
| 1/4 page color | (6.5"x5") | $264 |
| 1/8 Classify ad | (3.25"x5") | $100 |
| Business Card | | $50 |

### Our 2015 Publishing Dates កាលវិភាគបោះពុម្ព

| | |
|---|---|
| January | 2th & 23rd |
| February | 6th & 20th |
| March | 6th & 20th |
| April | 3rd & 24th |

*all ad materials are due one week prior to publishing date.

រាល់គំរូពាណិជ្ជកម្មត្រូវបញ្ជូនសប្តាហ៍មុនចូលរោងពុម្ព




Call or Visit our Sales Office
45 Merrimack Street. Suite 218A. Lowell, MA 01852
Tel: 978.677.7163. Cell: 978. 656.8141 Fax: 978.677.7092
Email: sobenpin@khmerpost.us or KhmerPostUSA@gmail.com
www.khmerpost.us | www.facebook.com/KhmerPostUSA




# ខ្មែរផុសស.រ.អា

## មានទទួលធ្វើការងារបន្ថែម

- កាសែត
- ទស្សនាវដ្ដី
- Poster
- Banner
- ធៀបការ
- សំបុត្របុណ្យ
- នាមប័ណ្ណ
- ខួបកំណើត
- សំបុត្រឡើងគេហដ្ឋាន

សូមទាក់ទងមកតាមរយៈទូរស័ព្ទ:

**Tel: 978-656-8141**

Email: khmerpostusa@gmail.com